ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

ឆ្នាំគម្រប់ពីរ

ខ្សែ ៤




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណើម៉ង្គ

គ្រិ. ឆ្នាំ ១៩២៧

ពុ. ស. ២៤៧០



អ្នកទទួលខុសត្រូវ ជុំ-មៅ

# បញ្ជីរឿង



(អត្ថបទគតិលោកនេះ មិនបានលើកយកមកបោះពុម្ពជាថ្មីទេ ព្រោះមានចេញផ្សាយជាសៀវភៅរួចហើយ)

សេចក្ដីស្រង់អំពីសំបុត្រ ១ ច្បាប់ ពីលោក លី-ហ្វី ឈ្វាត់ ដែល ជាអ្នករៀបរៀងពង្សាវតារព្រះពុទ្ធសាសនា ដែលបានបោះពុម្ពក្នុងទស្សនា-វដ្ដី កម្ពុជសុរិយា ក្នុងឆ្នាំទី ១ ។

លិខិតនេះ ជាសេចក្ដីតបនឹងបុតហ្វាយ ១ ច្បាប់ ដែលព្រះអង្គម្ចាស់ ក្រុមព្រះ ឆរោត្តម ភាណុរ័ង្ស ទីឧត្តមហាសេនាធិបតី អធិបតីក្រុមជំនុំ កាន់កាប់ព្រះរាជបណ្ណាល័យ តាំងនាមក្រុមជំនុំទាំងអស់ ថ្លែងសេចក្ដីសោមនស្ស ដែលទ្រង់គាប់ព្រះរាជហឫទ័យ នឹងកិច្ចការដែលលោក លី-ហ្វី ឈ្វាត់បានធ្វើ ដើម្បីជួយឧបត្ថម្ភគាំទ្រដល់ព្រះរាជបណ្ណាល័យ ។

ក្រុមការ **ជុំ-ម៉ៅ** ធ្វើរាជការក្នុងព្រះរាជបណ្ណាល័យ ជាអ្នកស្រង់ សេចក្ដី ហើយប្រែពីភាសាបារាំងមកជាភាសាខ្មែរ ។



# សេចក្ដីស្រង់

. . . . . . . . .

. . . . . . . . .

មិនជាកន្លងឆ្ងាយប៉ុន្មានពី ៣០ ឆ្នាំហើយ ដែលទូលបង្គំជាខ្ញុំ បានឈានជើងជាន់លើដីក្រុងកម្ពុជា ជាដំបូងបង្អស់ ហើយក្រោយពីកាលនោះមកទូលបង្គំជាខ្ញុំ បានត្រឡប់មកក្នុងក្រុងកម្ពុជាវិញ ជាច្រើនដងទៀត ក្នុងឱកាសដែលទូលបង្គំជាខ្ញុំមកម្ដង ៗ នោះ ទូលបង្គំបានសេចក្ដីសប្បាយរីករាយ បានសេចក្ដីស្រឡាញ់ជាថ្មីទាំងរស់គ្រប់ៗ ពេល សេចក្ដីស្រឡាញ់ ដែលទូលបង្គំមានចំពោះដល់ក្រុងកម្ពុជានេះ ទូលបង្គំខំព្យាយាម មិនឲ្យសាបសូន្យទៅវិញឡើយ ហើយទូលបង្គំស្មានថា សេចក្ដីព្យាយាមនោះ បានសម្រេចដោយប្រការខ្លះហើយដែរ ទូលបង្គំជាខ្ញុំមានសេចក្ដីសាទរដោយពេញទី នៅវេលាដែលបានឃើញសេចក្ដីកង្វុត-ហ្មាយ ដែលទ្រង់ប្រាថ្នាដល់កិច្ចការដែលទូលបង្គំបានធ្វើនោះ ។

ទូលបង្គំជាខ្ញុំមានសេចក្ដីសោមនស្ស ដោយចំណែកអំពីកិច្ចការខ្លះដែលទូលបង្គំបានធ្វើ ដើម្បីជាប្រយោជន៍ដល់ព្រះរាជបណ្ណាល័យរបស់ទ្រង់ ដែលបានសេចក្ដីចម្រើនដោយរហ័សឆាប់ ដោយអំណាចសេចក្ដីប៉ុនប្រសប់និងសេចក្ដីស្លូតត្រង់ របស់នាងក្រមុំ ការប៉ឺឡែស ហើយនិង

ដោយអំណាចសតិបញ្ញា និងគំនិតយោបល់យ៉ាងខ្ពស់ របស់ក្រុមជំនុំ
កាន់កាប់ទាំងឡាយ សេចក្ដីដែលមនុស្សជាតិគ្រប់ថ្នាក់ក្នុងលោកសន្និវាស
បានទទួលស្គាល់ហើយ អបអរសាទរនឹងព្រះរាជបណ្ណាល័យ ព្រមទាំង
សេចក្ដីដែលព្រះរាជបណ្ណាល័យបានផ្សាយ មានទស្សនាវដ្ដីជាដើម ដែល
ជាការមានប្រយោជន៍នោះ បានជាភស្តុតាង ថាកិច្ចការដែលមន្ទីរនេះបាន
ធ្វើ ត្រូវចំលើកិច្ចធុរៈរបស់ជាតិខ្មែរ គឺថាព្រះរាជបណ្ណាល័យបានបង្កើត
ឡើងពានទៅលើវិធីដ៏ត្រឹមត្រូវ និងគោលការណ៍ដ៏ប្រសើរ ទូលបង្គំជាខ្ញុំសូម
ឧទ្ទិសកុសលរាសី និងគុណសម្បត្តិចំពោះដល់ព្រះរាជបណ្ណាល័យ សូម
ឲ្យបានសេចក្ដីចម្រើន ឋិតថេរចីរកាលតរៀងទៅ ហើយសូមឲ្យបានជួប
ជុំនិងមិត្តដ៏ប្រសើរជាច្រើនឡើងទៀត ដើម្បីជួយគាំទ្រថែមជាមួយនឹងមិត្ត
ចាស់ទាំងប៉ុន្មាន ហើយជំនុំមិត្តរបស់ព្រះរាជបណ្ណាល័យទាំងឡាយនោះ
សូមទ្រង់ករុណាពិសេសកប់ទូលបង្គំជាខ្ញុំបញ្ចូល ១ ផង . .

. . . . . . . . .

លី-ហ៊ី ណាក់



# ព្រះធម្មចក្កប្បវត្តនសុត្ត

ព្រះមហា ននួ

## ប្រែពីបាលីមកជាខេមរភាសា

---

ធម្មចក្កប្បវត្តនសុត្តប្បកាសនំ

ពាក្យប្រកាសផ្តើមនិងសូត្រនូវព្រះធម្មចក្កប្បវត្តនសូត្រ

បណ្តាអ្នកបម្រុងនឹងសូត្រធម្មចក្កនោះ ត្រូវឲ្យតែម្នាក់ឬពីរនាក់សូត្រប្រកាសថា ៖

អនុត្តរំ អភិសម្ពោធឹ សម្ពុជ្ឈិត្វា តថាគតោ បឋមំ-យំ អទេសេសិ ធម្មចក្កំ អនុត្តរំ សម្មទេវ បវត្តេន្តោ លោកេ អប្បដិវត្តិយំ ។

ព្រះតថាគតជាម្ចាស់ ទ្រង់បានត្រាស់ នូវព្រះ អនុត្តរសម្មា-សម្ពោធិញ្ញាណហើយ កាលព្រះអង្គប្រកាសនូវធម៌ដែលឥតមានអ្នកឯណាមួយក្នុងលោក និងអាចឲ្យប្រព្រឹត្តទៅបាន មានតែព្រះអង្គទើបអាចឲ្យប្រព្រឹត្តទៅបានដោយប្រពៃពិត ទ្រង់បានសម្តែងហើយ នូវធម្មចក្កដ៏ប្រសើរឯណាជាមុនដំបូង ។

យត្ថាក្ខាតា ឧភោ អន្តា បដិបត្តិ ច មជ្ឈិមា ចតុស្វា-រិយសច្ចេសុ វិសុទ្ធិញ្ញាណទស្សនំ ។

គឺជាធម៌ដែលជាផ្លូវប្រតិបត្តិដ៏លាមកអាក្រក់ ថយថោកទាំងឡាយពីរប្រការ និងផ្លូវប្រតិបត្តិជាកណ្តាល និងប្រាជ្ញាដែលឃើញជាក់ច្បាស់ក្នុងអរិយសច្ចទាំងឡាយ ៤ ជាប្រាជ្ញាដ៏បរិសុទ្ធ ដែលព្រះអង្គបានសម្តែងហើយក្នុងព្រះធម្មចក្កឯណា ។

ទេសិតំ ធម្មចក្កេន សម្មាសម្ពោធិកិត្តនំ នាមេ-ន វិស្សុតំ សុត្តំ ធម្មចក្កប្បវត្តនំ វេយ្យាករណបាឋេន សង្គីតន្តំ ភណាម សេ ។

យើងទាំងឡាយចូរស្មូត្រនូវព្រះធម្មចក្កនោះ ដែលព្រះសម្មាសម្ពុទ្ធជាធម្មរាជ ទ្រង់សម្តែងហើយប្រាកដ ដោយឈ្មោះថាធម្មចក្កប្បវត្តនសូត្រ ជាព្រះសូត្រប្រកាសនូវសម្មាសម្ពោធិញាណ គឺប្រកាសឲ្យដឹងថា ព្រះអង្គប្រាកដជាបានត្រាស់ច្បាស់ ជាព្រះសព្វញ្ញុពុទ្ធហើយ ជាព្រះសូត្រគឺព្រះសង្គីតិកាចារ្យ បានប្រជុំគ្នាសង្គាយនារៀបរៀងដោយរបៀបជាបាលីវេយ្យាករណ៍ គឺជាព្រះសូត្រឥតមានគាថាឡើយ យើងត្រូវស្មូត្រឲ្យព្រមគ្នាក្នុងកាលនេះហោង ។

## ធម្មចក្កប្បវត្តនសុត្តំ

## ឯវម្មេ សុតំ

ព្រះធម្មចក្កប្បវត្តនសូត្រនេះ គឺខ្ញុំឈ្មោះអានន្ទថេរ បានស្តាប់មកហើយដោយអាការដូច្នេះថា ៖

ឯកំ សមយំ ភគវា ពារាណសិយំ វិហរតិ ឥសិបតនេ មិគទាយេ ។

សម័យមួយព្រះដ៏មានព្រះភាគ ទ្រង់គង់នៅក្នុងព្រៃ ឥសិបតនមិគទាយវ័ន ជិតក្រុងពារាណសី តត្រខោ ភគវា ភិក្ខូ អាមន្តេសិ ។

គ្រានោះព្រះដ៏មានព្រះភាគ ទ្រង់ត្រាស់ហៅបញ្ចវគ្គិយភិក្ខុទាំងឡាយ មកហើយ ទ្រង់ត្រាស់ទេសនានូវព្រះធម្មចក្កប្បវត្តនសូត្រថា ៖

ទ្វេមេ ភិក្ខវេ អន្តា បព្វជិតេន ន សេវិតព្វា ម្នាលភិក្ខុទាំងឡាយ អន្តធម៌ គឺសេចក្តីលាមកអាក្រក់ទាំងឡាយពីរយ៉ាងនេះ បព្វជិតមិនគួរសេព គឺជាមិនគួរប្រព្រឹត្តឡើយ កតមេ ទ្វេ អន្តធម៌ទាំងឡាយពីរយ៉ាងនោះ ដូចម្តេច ។

យោ ចាយំ កាមេសុ កាមសុខល្លិកានុយោគោ ហីនោ គម្មោ បោថុជ្ជនិកោ អនរិយោ អនត្ថសញ្ហិតោ ។

គឺការប្រកបខ្លួនឲ្យជាប់ជំពាក់នៅដោយកាម ក្នុងកិលេសកាមនិង វត្ថុកាមទាំងឡាយឯណា ជាធម៌របស់អ្នកស្រុក ជារបស់បុថុជ្ជន មិនមែន ជារបស់ព្រះអរិយ មិនមែនជាការប្រកបដោយប្រយោជន៍ឡើយនេះ១ ។

យោ ចាយំ អត្តកិលមថានុយោគោ ទុក្ខោ អនរិយោ អនត្ថសញ្ហិតោ ។

គឺការប្រកបសេចក្ដីនឿយហត់ដល់ខ្លួន គឺជាការខំប្រឹងប្រព្រឹត្តកាន់វត្តបែបយ៉ាងនិគ្រន្ថតិរ្ថិយ ឲ្យតែនឿយខ្លួនឥតអំពើ ឯណាដែលជាហេតុនាំឲ្យតែលំបាកកាយទទេ ៗ មិនមែនជាធម៌របស់អរិយ មិនមែនជាការប្រកបដោយប្រយោជន៍ឡើយនេះ ១ ។

ឯតេ តេ ភិក្ខវេ ឧភោ អន្តេ អនុបគម្ម មជ្ឈិមា បដិ-បទា តថាគតេន អភិសម្ពុទ្ធា ចក្ខុករណី ញាណករ-ណី ឧបសមាយ អភិញ្ញាយ សម្ពោធាយ និព្វា-នាយ សំវត្តតិ ។

ម្នាលភិក្ខុទាំងឡាយ មជ្ឈិមបដិបទា គឺសេចក្ដីប្រតិបត្តិជាកណ្ដាល ដែលមិនឈាយប្រឡំនឹងអន្តធម៌ ទាំងឡាយពីរយ៉ាងនោះ នោះឯង ដែលតថាគតបានត្រាស់ដឹងហើយ ជាសេចក្ដីប្រតិបត្តិធ្វើឲ្យកើតបញ្ញាចក្ខុ (ភ្នែកគឺប្រាជ្ញា) ធ្វើឲ្យកើតសេចក្ដីដឹងច្បាស់ប្រាកដរមែងប្រព្រឹត្តទៅ ដើម្បីសេចក្ដីរម្ងាប់ ដើម្បីសេចក្ដីដឹងចំពោះ ដើម្បីសេចក្ដីដឹងដោយប្រពៃ ដើម្បីសេចក្ដីរលត់ទុក្ខ ។

កតមា ច សា ភិក្ខវេ មជ្ឈិមា បដិបទា តថាគតេន-អភិសម្ពុទ្ធា ចក្ខុករណី ញាណករណី ឧបសមាយ អភិញ្ញាយ សម្ពោធាយ និព្វានាយ សំវត្តតិ ។

ម្នាលភិក្ខុទាំងឡាយ មជ្ឈិមបដិបទាដែលតថាគត បានត្រាស់ដឹងហើយ ដែលជាជាសេចក្ដីប្រតិបត្តិធ្វើឲ្យកើតបញ្ញាចក្ខុ (ភ្នែកគឺប្រាជ្ញា) ធ្វើឲ្យកើតសេចក្ដីដឹងច្បាស់ប្រាកដ រមែងប្រព្រឹត្តទៅដើម្បីសេចក្ដីរម្ងាប់ ដើម្បីសេចក្ដីដឹងចំពោះ ដើម្បីសេចក្ដីដឹងដោយប្រពៃ ដើម្បីសេចក្ដីរលត់ទុក្ខនោះដូចម្ដេច ។

## អយមេវអរិយោអដ្ឋង្គិកោមគ្គោ

អដ្ឋង្គិកមគ្គ គឺធម៌ជាផ្លូវមានអង្គ ៨ ជាគ្រឿងចេញដើរទៅពាកសឹកសត្រូវគឺកិលេសនេះឯង ហៅថាមជ្ឈិមបដិបទា ។

សេយ្យថីទំ អដ្ឋង្គិកមគ្គនោះដូចម្ដេច ឯអដ្ឋង្គិកមគ្គនោះ គឺ : សម្មាទិដ្ឋិ គឺប្រាជ្ញាដែលយល់ត្រូវ ១ សម្មាសង្កប្បោ គឺតម្រិះត្រូវ ១ សម្មាវាចា គឺសម្ដីត្រូវ ១ សម្មាកម្មន្តោ គឺការងារត្រូវ ១ សម្មាអាជីវោ គឺកិរិយាចិញ្ចឹមជីវិតត្រូវ ១ សម្មាវាយាមោ គឺព្យាយាមត្រូវ ១ សម្មាសតិ គឺសេចក្ដីរលឹកត្រូវ ១ សម្មាសមាធិ គឺកិរិយាតម្កល់ចិត្តត្រូវ ១ ។

អយំ ខោ សា ភិក្ខវេ មជ្ឈិមាបដិបទា តថាគតេន អ-ភិសម្ពុទ្ធា ចក្ខុករណី ញាណករណី ឧបសមាយ អភិញ្ញាយ សម្ពោធាយ និព្វានាយ សំវត្តតិ ។

ម្នាលភិក្ខុទាំងឡាយ អដ្ឋង្គិកមគ្គ នេះឯង ដែលហៅថា មជ្ឈិមបដិបទា ដែលតថាគតបានត្រាស់ដឹងហើយនោះ ជាសេចក្តីប្រតិបត្តិធ្វើឲ្យកើត បញ្ញាចក្ខុ (ភ្នែកគឺប្រាជ្ញា) ធ្វើឲ្យកើតសេចក្តីដឹងច្បាស់ប្រាកដ រមែងប្រព្រឹត្តទៅ ដើម្បីសេចក្តីរម្ងាប់ ដើម្បីសេចក្តីដឹងចំពោះ ដើម្បីសេចក្តីដឹងដោយប្រពៃ ដើម្បីសេចក្តីរលត់ទុក្ខ ។

ឥទំ ខោ បន ភិក្ខវេ ទុក្ខំ អរិយសច្ចំ ជាតិបិ ទុក្ខា ជរាបិ ទុក្ខា ព្យាធិបិ ទុក្ខា មរណម្បិ ទុក្ខំ អប្បិយេហិ សម្បយោគោ ទុក្ខោ បិយេហិ វិប្បយោគោ ទុក្ខោ យម្បិច្ឆំ ន លភតិ តម្បិ ទុក្ខំ សំខិត្តេន បញ្ចុបាទានក្ខន្ធា-បិ ទុក្ខា ។

*កិរិយាកកើតនៃខន្ធ* ម្នាលភិក្ខុទាំងឡាយ សេចក្តីចាស់គ្រាំគ្រានៃខន្ធ ឈឺចាប់នៃខន្ធ បែកធ្លាយនៃខន្ធ ក៏ជាទីនាំមកនូវទុក្ខ សភាពប្រកបនៅដោយសត្វ និងសង្ខារទាំងឡាយដែលមិនជាទីស្រឡាញ់ពេញចិត្តក្តី ព្រាត់ប្រាសចាកសត្វ និងសង្ខារទាំងឡាយ ជាទីស្រឡាញ់ពេញចិត្តក្តី ក៏ជាទីនាំមកនូវទុក្ខ កាលបើប្រាថ្នានូវវត្ថុឯណាមួយហើយ មិនបាននូវវត្ថុនោះក៏ជាទីនាំមកនូវទុក្ខ ឧបាទានក្ខន្ធទាំងឡាយ ដែលព្រះដ៏មានព្រះភាគសម្តែងហើយ ដោយសេចក្តីបំប្រួញ ក៏ជាទីនាំមកនូវទុក្ខ គង់ទុក្ខមានការកើតនៃខន្ធ ៥ ជាដើមនេះឯង ឈ្មោះថា ទុក្ខអរិយសច្ច ។

ឥទំ ខោ បន ភិក្ខវេ ទុក្ខសមុទយោ អរិយសច្ចំ យាយំ តណ្ហា បោនោព្ភវិកា នន្ទិរាគសហគតា តត្រតត្រាភិនន្ទិនី សេយ្យថីទំ កាមតណ្ហា ភវតណ្ហា វិភវតណ្ហា ។

ម្នាលភិក្ខុទាំងឡាយ តណ្ហា ឯណា មានប្រក្រតីតាក់តែងនូវភពថ្មី ដល់ព្រមដោយសេចក្តីត្រេកអរក្នុងភព មានប្រក្រតីឲ្យត្រេកអរក្នុងភពនោះ តណ្ហានោះដូចម្តេច តណ្ហានោះ គឺកាមតណ្ហា១ ភវតណ្ហា១ វិភវតណ្ហា ១ សេចក្តីប្រាថ្នាមាន កាមតណ្ហា ជាដើមនេះឯង ឈ្មោះទុក្ខសមុទយសច្ច ។

ឥទំ ខោ បន ភិក្ខវេ ទុក្ខនិរោធោ អរិយសច្ចំ យោ តស្សាយេវ តណ្ហាយ អសេសវិរាគនិរោធោ ចាគោ បដិនិស្សគ្គោ មុត្តិ អនាលយោ ។

ម្នាលភិក្ខុទាំងឡាយ កិរិយារលត់បង់នូវតណ្ហានោះ ដោយអរិយមគ្គមិនឲ្យតណ្ហាសល់នៅបានឯណា កិរិយាលះបង់លោះបង់ចោលនូវតណ្ហានោះឯណា កិរិយាផុតចាកតណ្ហានោះឯណា មិនមានអាល័យក្នុងតណ្ហានោះឯណា កិរិយារលត់នូវតណ្ហាដោយអរិយមគ្គមិនឲ្យសល់នូវជាដើមនោះឯង ឈ្មោះ ទុក្ខនិរោធសច្ច ។

ឥទំខោបនភិក្ខវេទុក្ខនិរោធគាមិនី បដិបទាអរិ-
យសច្ចំអយមេវអរិយោ អដ្ឋង្គិកោមគ្គោ សេយ្យថីទំ
សម្មាទិដ្ឋិ សម្មាសង្កប្បោ សម្មាវាចា សម្មា-
កម្មន្តោ សម្មាអាជីវោ សម្មាវាយាមោ សម្មាសតិ
សម្មាសមាធិ ។

ម្នាលភិក្ខុទាំងឡាយ អរិយមគ្គនេះឯងដ៏ប្រសើរ ប្រកបដោយអង្គ ៨ ប្រការ អរិយមគ្គនោះដូចម្តេច មគ្គដែលប្រកបដោយអង្គ ៨ ប្រការ គឺប្រាជ្ញាដែលយល់ត្រូវ ១ គឺតម្រិះត្រូវ ១ គឺសម្តីត្រូវ ១ គឺការងារត្រូវ ១ គឺកិរិយាចិញ្ចឹមជីវិតត្រូវ ១ គឺព្យាយាមត្រូវ ១ គឺសេចក្តីរលឹកត្រូវ ១ គឺកិរិយាតម្កល់ចិត្តត្រូវ ១ អរិយមគ្គប្រកបដោយអង្គ ៨ ប្រការនេះឯង ឈ្មោះ ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ។

កាលត្រាស់ទេសនា លក្ខណអរិយសច្ច ៤ ប្រការ ដូច្នេះហើយ ទើបត្រាស់ទេសនាញាណទាំង ៣ ប្រការ គឺសច្ចញាណ ១ កិច្ចញាណ ១ កតញាណ ១ ឲ្យប្ឃូទៅក្នុងអរិយសច្ច ៤ តទៅថា ៖

ឥទំទុក្ខំអរិយសច្ចន្តិមេភិក្ខវេបុព្វេ អននុស្សុតេ-
សុធម្មេសុ ចក្ខុំឧទបាទិ ញាណំឧទបាទិ បញ្ញាឧទបាទិ
វិជ្ជាឧទបាទិ អាលោកោឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនភ្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុងទុក្ខសច្ចធម៌ទាំងឡាយ ដែលតថាគតមិនធ្លាប់ដែលបានឮ ក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគតដូច្នេះថា កងទុក្ខមានជាតិទុក្ខជាដើមនេះ ឈ្មោះទុក្ខអរិយសច្ច ។

តំខោបនិទំទុក្ខំអរិយសច្ចំបរិញ្ញេយ្យន្តិមេ ភិក្ខវេ បុព្វេអននុស្សុតេសុ ធម្មេសុ ចក្ខុំឧទបាទិ ញាណំឧទបាទិ បញ្ញាឧទបាទិ វិជ្ជាឧទបាទិ អាលោកោ-ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនភ្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុងទុក្ខសច្ចធម៌ទាំងឡាយ ដែលតថាគតមិនធ្លាប់ដែលបានឮក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគតដូច្នេះ ថាកងទុក្ខមានជាតិទុក្ខជាដើមនេះ ឈ្មោះថាទុក្ខអរិយសច្ច ទុក្ខអរិយសច្ចនោះឯង គឺតថាគតគប្បីកំណត់បាន ។

តំ ខោ បនិទំ ទុក្ខំ អរិយសច្ចំ បរិញ្ញាតន្តិ មេ ភិក្ខវេ បុព្វេ អននុស្សុតេសុ ធម្មេសុ ចក្ខុំ ឧទបាទិ ញាណំ ឧទបាទិ បញ្ញា ឧទបាទិ វិជ្ជា ឧទបាទិ អាលោកោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុងទុក្ខអរិយសច្ចធម៌ ទាំងឡាយដែលតថាគតមិនធ្លាប់ដែលបានឮក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគតដូច្នេះថា កងទុក្ខមានជាតិទុក្ខជាដើមឈ្មោះថា ទុក្ខអរិយសច្ច ទុក្ខអរិយសច្ច នេះឯង គឺតថាគតកំណត់បានហើយ ។

កាលត្រាស់ទេសនាសច្ចញាណ កតញាណក្នុងទុក្ខអរិយសច្ចចប់ហើយ ទើបទេសនា សច្ចញាណ កិច្ចញាណ កតញាណ ក្នុង ទុក្ខសមុទយសច្ច តទៅទៀតថា ៖

ឥទំ ទុក្ខសមុទយោ អរិយសច្ចន្តិ មេ ភិក្ខវេ បុព្វេ អននុស្សុតេសុ ធម្មេសុ ចក្ខុំ ឧទបាទិ ញាណំ ឧទបាទិ បញ្ញា ឧទបាទិ វិជ្ជា ឧទបាទិ អាលោកោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុ ដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុង ទុក្ខសមុទយសច្ច ធម៌ទាំង-ឡាយ ដែលតថាគតមិនធ្លាប់ដែលបានឮ ក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគតដូច្នេះថា កាមតណ្ហា ភវតណ្ហា វិភវតណ្ហា, នេះ ឈ្មោះថា ទុក្ខសមុទយអរិយសច្ច ។

តំ ខោ បនិទំ ទុក្ខសមុទយោ អរិយសច្ចំ បហាតព្វន្តិ មេ ភិក្ខវេ បុព្វេ អននុស្សុតេសុ ធម្មេសុ ចក្ខុំ ឧទបាទិ ញាណំ ឧទបាទិ បញ្ញា ឧទបាទិ វិជ្ជា ឧទបាទិ អាលោ-កោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុ ដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុស មិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុង ទុក្ខសមុទយសច្ច ធម៌ទាំងឡាយ ដែលតថាគតមិនធ្លាប់ដែលបានឮ ក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគតដូច្នេះថា កាមតណ្ហា ភវតណ្ហា វិភវតណ្ហា នេះ ឈ្មោះថា ទុក្ខសមុទយអរិយសច្ច ទុក្ខសមុទយអរិយសច្ច នោះឯង គឺតថាគតគប្បីកំណត់លះបង់ចោល ។

តំខោ បនិទំ ទុក្ខសមុទយោ អរិយសច្ចំ បហីនន្តិ-មេ ភិក្ខវេ បុព្វេ អននុស្សុតេសុ ធម្មេសុ ចក្ខុំ ឧទបាទិ ញាណំ ឧទបាទិ បញ្ញា ឧទបាទិ វិជ្ជា ឧទបាទិ អាលោ-កោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាង ក្នុង ទុក្ខនិរោធអរិយសច្ច ធម៌ទាំងឡាយដែលតថាគតមិនធ្លាប់ដែលបានឮក្នុងកាលមុនសោះឡើយកើតឡើងហើយដល់តថាគតដូច្នេះថា ព្រះនិព្វាន នេះឈ្មោះថា ទុក្ខសមុទយអរិយសច្ច ទុក្ខសមុទយអរិយសច្ច នោះឯង គឺតថាគតធ្វើឲ្យជាក់ច្បាស់ហើយ ។

កាលត្រាស់ទេសនា សច្ចញ្ញាណ, កិច្ចញ្ញាណ, កតញ្ញាណ ក្នុង ទុក្ខនិរោធអរិយសច្ច ចប់ហើយទើបត្រាស់ទេសនា សច្ចញ្ញាណ កិច្ចញ្ញាណ កតញ្ញាណ ក្នុង ទុក្ខ-និរោធគាមិនីបដិបទាអរិយសច្ច តទៅទៀតថា ៖

ឥទំ ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ចន្តិ មេ ភិក្ខ-វេ បុព្វេ អននុស្សុតេសុ ធម្មេសុ ចក្ខុំ ឧទបាទិ ញាណំ ឧទបាទិ បញ្ញា ឧទបាទិ វិជ្ជា ឧទបាទិ អាលោកោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុស មិនភ្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា៨បញ្ញាដែលភ្លឺស្វាងក្នុងទុក្ខនិរោធអរិយសច្ច ធម៌ទាំងឡាយដែលតថាគតមិនធ្លាប់ដែលបានឮក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគតដូច្នេះថា ព្រះនិព្វាននេះឈ្មោះថា ទុក្ខនិរោធអរិយសច្ច ។

តំ ខោ បនិទំ ទុក្ខនិរោធអរិយសច្ចំ សច្ឆិកាតព្វន្តិ មេ ភិក្ខវេ បុព្វេ អននុស្សុតេសុ ធម្មេសុ ចក្ខុំ ឧទបាទិ ញាណំ ឧទបាទិ បញ្ញា ឧទបាទិ វិជ្ជា ឧទបាទិ អាលោកោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយបញ្ញាចក្ខុ ដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនភ្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុងទុក្ខនិរោធអរិយសច្ច ធម៌ទាំងឡាយដែលតថាគតមិនធ្លាប់ដែលបានឮក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគត ដូច្នេះថាព្រះនិព្វាននេះឈ្មោះថា ទុក្ខនិរោធអរិយសច្ច ទុក្ខនិរោធអរិយសច្ច នោះឯង គឺតថាគតធ្វើឲ្យច្បាស់ឡើង ។

តំខោបនិទំទុក្ខនិរោធោអរិយសច្ចំ សច្ឆិកាតព្វន្តិមេ ភិក្ខវេបុព្វេអននុស្សុតេសុធម្មេសុ ចក្ខុំឧទបាទិ ញាណំឧទបាទិ បញ្ញាឧទបាទិ វិជ្ជាឧទបាទិ អាលោកោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុង ទុក្ខនិរោធអរិយសច្ច ធម៌ទាំងឡាយ ដែលតថាគតមិនធ្លាប់ដែលបានឮក្នុងកាលមុនសោះឡើយ កើតរឿងហើយដល់តថាគត ដូច្នេះថា ព្រះនិព្វាននេះឈ្មោះថា ទុក្ខនិរោធអរិយសច្ច ទុក្ខនិរោធអរិយសច្ច នោះឯង គឺតថាគតធ្វើឲ្យជាក់ច្បាស់ហើយ ។

កាលត្រាស់ទេសនា សច្ចញ្ញាណ កិច្ចញ្ញាណ កតញ្ញាណ ក្នុង ទុក្ខនិរោធអរិយសច្ច ចប់ហើយ ទើបត្រាស់ទេសនា សច្ចញ្ញាណ កិច្ចញ្ញាណ កតញ្ញាណ ក្នុង ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច តទៅទៀតថា ៖

ឥទំទុក្ខនិរោធគាមិនីបដិបទាអរិយសច្ចន្តិមេ ភិក្ខវេបុព្វេអននុស្សុតេសុធម្មេសុ ចក្ខុំឧទបាទិ ញាណំឧទបាទិ បញ្ញាឧទបាទិ វិជ្ជាឧទបាទិ អាលោកោឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុស មិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុង ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ធម៌ទាំងឡាយគឺ តថាគត មិនធ្លាប់ដែលបានឮ ក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគត ដូច្នេះថា អរិយមគ្គប្រកបដោយអង្គ ៨ ប្រការនេះឈ្មោះថា ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ។

តំខោបនិទំទុក្ខនិរោធគាមិនីបដិបទាអរិយសច្ចំ ភាវេតព្ពន្តិមេភិក្ខវេបុព្វេអននុស្សុតេសុធម្មេសុចក្ខុំឧទបាទិ ញាណំឧទបាទិ បញ្ញាឧទបាទិ វិជ្ជាឧទបាទិ អាលោកោឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុ ដែលឃើញច្បាស់បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុស មិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា៣ និងវិជ្ជា ៨ បញ្ញាដែលភ្លឺស្វាងក្នុង ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ទាំងឡាយ គឺតថាគតមិនធ្លាប់ដែលបានឮ ក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគត ដូច្នេះថា អរិយមគ្គ ប្រកបដោយអង្គ ៨ ប្រការនេះ ឈ្មោះថា ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ចនោះឯង គឺតថាគតគប្បី

ចម្រើនឲ្យកើតឡើង ។

តំ ខោ បនិទំ ទុក្ខនិរោធគាមិនីបដិបទា អរិយសច្ចំ ភាវិតន្តិ មេ ភិក្ខវេ បុព្វេ អននុស្សុតេសុ ធម្មេសុ ចក្ខុំ ឧទបាទិ ញាណំ ឧទបាទិ បញ្ញា ឧទបាទិ វិជ្ជា ឧទបាទិ អាលោកោ ឧទបាទិ ។

ម្នាលភិក្ខុទាំងឡាយ បញ្ញាចក្ខុដែលឃើញច្បាស់ បញ្ញាដែលដឹងច្បាស់ បញ្ញាដែលដឹងមិនខុសមិនក្លាត់ បញ្ញាដែលដឹងក្នុងវិជ្ជា ៣និងវិជ្ជា៨ បញ្ញាដែលភ្លឺស្វាងក្នុងទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច ធម៌ទាំងឡាយ ដែលតថាគតមិនធ្លាប់ដែលបានឮក្នុងកាលមុនសោះឡើយ កើតឡើងហើយដល់តថាគត ដូច្នេះថាព្រះ អរិយមគ្គប្រកបដោយអង្គ ៨ ប្រការនេះ ឈ្មោះថា ទុក្ខនិរោធគាមិនីបដិបទាអរិយសច្ច នោះឯង គឺតថាគតបំរើនឲ្យកើតហើយ ។

យាវកីវញ្ច មេ ភិក្ខវេ ឥមេសុ ចតូសុ អរិយសច្ចេសុ ឯវន្តិបរិវដ្ដំ ទ្វាទសាការំ យថាភូតំ ញាណទស្សនំ ន សុវិសុទ្ធំ អហោសិ ។

ម្នាលភិក្ខុទាំងឡាយ ញាណដែលឃើញអរិយសច្ច ថា មានបរិវដ្ដ ៣ មានអាការ ១២ ប្រព្រឹត្តទៅក្នុងអរិយសច្ចទាំងឡាយ ៤ នេះ ដូច្នេះមិនទាន់បរិសុទ្ធល្អ បានដល់តថាគតដោយពិតត្រឹមណា ។

នេវតាវាហំភិក្ខវេ សទេវកេលោកេ សមារកេ សព្រហ្មកេ សស្សមណព្រាហ្មណិយាបជាយ សទេវមនុស្សាយ អនុត្តរំ សម្មាសម្ពោធឹអភិសម្ពុទ្ធោបច្ចញ្ញាសឹ ។

ម្នាលភិក្ខុទាំងឡាយ តថាគតក៏មិនទាន់ប្តេជ្ញាខ្លួនថាជាអ្នកត្រាស់ដឹងនូវសម្មាសម្ពោធិញ្ញាណ មិនមានការត្រាស់ឯទៀតក្រៃលែងជាង ព្រមទាំងទេវលោក មារលោក ព្រហ្មលោក ក្នុងពួកសត្វ ព្រមទាំងសមណព្រាហ្មណ៍ ទាំងទេវតា និងមនុស្សត្រឹមនោះឯង ។

យតោចខោមេភិក្ខវេ ឥមេសុចតូសុ អរិយសច្ចេសុ ឯវំ តិបរិវដ្ដំទ្វាទសាការំ យថាភូតំញាណទស្សនំ សុវិសុទ្ធំអហោសិ ។

ម្នាលភិក្ខុទាំងឡាយ ញាណដែលឃើញ អរិយសច្ច ថាមានបរិវដ្ត ៣ មានអាការ ១២ ឲ្យប្រព្រឹត្តទៅក្នុង អរិយសច្ច ទាំងឡាយ ៤ នេះ ដូច្នេះបរិសុទ្ធល្អ មានដល់តថាគតកាលណាហើយ ។

អថាហំភិក្ខវេ សទេវកេលោកេ សមារកេ សព្រហ្មកេ សស្សមណព្រាហ្មណិយាបជាយ សទេវមនុស្សាយអនុត្តរំ សម្មាសម្ពោធឹអភិសម្ពុទ្ធោបច្ចញ្ញាសឹ ។

ម្នាលភិក្ខុទាំងឡាយ តថាគតក៏ប្តេជ្ញាខ្លួនថា ជាអ្នកត្រាស់ដឹងនូវសម្មាសម្ពោធិញ្ញាណ មិនមានការត្រាស់ដឹងឯទៀតក្រៃលែងជាងក្នុងលោក ព្រមទាំងទេវលោក មារលោក ព្រហ្មលោក ក្នុងពួកសត្វព្រមទាំងសមណព្រាហ្មណ៍ ទាំងទេវតា និងមនុស្ស ក្នុងកាលនោះឯង ។

ញាណញ្ច បន មេ ទស្សនំ ឧទបាទិ អកុប្បា មេ វិមុត្តិ អយមន្តិមា ជាតិ នត្ថិ ទានិ បុនព្ភវោតិ ។

ក៏បញ្ញាដែលដឹងច្បាស់ បានកើតឡើងហើយដល់តថាគតដូច្នេះថា សេចក្តីរួចដោយវិសេសរបស់តថាគត មិនប្រែត្រឡប់កម្រើកទៀតឡើយ ជាតិនេះក៏ជាទីបំផុតត្រឹមនេះហើយ ឥឡូវនេះ ភពថ្មី គឺការត្រឡប់កើតទៀតក៏មិនមានឡើយ ។

## ឥទមវោច ភគវា

លុះព្រះដ៏មានព្រះភាគទេសនា ព្រះធម្មចក្កប្បវត្តនសូត្រនេះចប់ហើយ ។

អត្តមនា បញ្ចវគ្គិយា ភិក្ខូ ភគវតោ ភាសិតំ អភិនន្ទុំ ។

បញ្ចវគ្គិយភិក្ខុ ទាំងឡាយ ក៏ត្រេកអររីករាយនឹងភាសិតរបស់ព្រះដ៏មានព្រះភាគពន់ពេកណាស់ ។

ឥមស្មិញ្ច បន វេយ្យាករណស្មឹ ភញ្ញមានេ អាយស្មតោ កោណ្ឌញ្ញស្ស វិរជំ វីតមលំ ធម្មចក្ខុំ ឧទបាទិ ។

នាកាលវេយ្យាករណ៍ គឺព្រះសូត្រដែលមិនមានគាថានេះ គឺព្រះដ៏មានព្រះភាគត្រាស់ទេសនាហើយ ធម្មចក្ខុ គឺ សោតាបត្តិមគ្គ ដ៏ប្រាសចាកធូលីគឺរាគ ប្រាសចាកមន្ទិលអកុសលកើតឡើងហើយ ដល់ព្រះកោណ្ឌញ្ញ ដ៏មានអាយុ ។

យំ កិញ្ចិ សមុទយធម្មំ សព្វន្តំ និរោធធម្មន្តិ អកុសលធម៌ឯណាមួយ ដែលមានសភាវៈកកើតឡើង អកុសលនោះ ក៏រលត់ទាំងអស់ទៅ ។

បវត្តិតេ ច ភគវតា ធម្មចក្កេ នាកាលព្រះ ធម្មចក្កប្បវត្តនសូត្រ គឺព្រះដ៏មានព្រះភាគត្រាស់ទេសនាចប់ហើយ ។

ភុម្មាទេវា សទ្ទមនុស្សាវេសុំ ឯតម្ភគវតា ពារាណសិយំ ឥសិបតនេ មិគទាយេ អនុត្តរំ ធម្មចក្កំ បវត្តិតំ អប្បដិវត្តិយំ សមណេន វា ព្រាហ្មណេន វា ទេវេន វា មារេន វា ព្រហ្មុនា វា កេនចិ វា លោកស្មិន្តិ ។

ភូមិទេវតាទាំងឡាយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅដូច្នេះថា ចក្រ គឺធម៌នេះ នឹងរកចក្រឯណាមួយឲ្យប្រែលែងបានគ្មាន គឺសមណៈក្តី ព្រាហ្មណ៍ក្តី ទេវតាក្តី មារក្តី ព្រហ្មក្តី អ្នកឯណាៗ ក្តី ក្នុងលោកនឹងសម្តែងពុំបានឡើយ ព្រះដ៏មានព្រះភាគ ព្រះអង្គត្រាស់ទេសនាហើយ ក្នុង ឥសិបតនមិគទាយវន ជិតក្រុងពារាណសី ។

ភុម្មានំ ទេវានំ សទ្ទំ សុត្វា ចាតុមហារាជិកា ទេវា សទ្ទមនុស្សាវេសុំ ។

ចាតុមហារាជិកា ទេវតាទាំងឡាយ បានឮសម្លេងនៃភុម្មទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេង ឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

ចាតុមហារាជិកានំ ទេវានំ សទ្ទំ សុត្វា តាវតឹសា-ទេវា សទ្ទមនុស្សាវេសុំ ។

តាវតិង្សទេវតាទាំងឡាយ បានឮសម្លេងនៃចាតុមហារាជិកាទេវតាទាំងឡាយហើយ ក៏ញុំាងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

តាវតឹសានំ ទេវានំ សទ្ទំ សុត្វា យាមា ទេវា សទ្ទ-មនុស្សាវេសុំ ។

យាមាទេវតាទាំងឡាយ បានឮសម្លេងតាវតិង្សទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

យាមានំ ទេវានំ សទ្ទំ សុត្វា តុសិតា ទេវា សទ្ទមនុស្សាវេសុំ ។

តុសិតទេវតាទាំងឡាយ បានឮសម្លេង យាមាទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេង ឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

តុសិតានំ ទេវានំ សទ្ទំ សុត្វា និម្មានរតី ទេវា សទ្ទៈ-
មនុស្សាវេសុំ ។

និម្មានរតី ទេវតាទាំងឡាយ បានឮសម្លេងតុសិតទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

និម្មានរតីនំ ទេវានំ សទ្ទំ សុត្វា បរនិម្មិតវសវត្តី ទេវា សទ្ទមនុស្សាវេសុំ ។

បរនិម្មិតវសវត្តី ទេវតាទាំងឡាយ បានឮសម្លេងនិម្មានរតីទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

បរនិម្មិតវសវត្តីនំ ទេវានំ សទ្ទំ សុត្វា ព្រហ្មបារិស-
ជ្ជា ទេវា សទ្ទមនុស្សាវេសុំ ។

ព្រហ្មបារិសជ្ជាទេវតាទាំងឡាយ បានស្ដាប់សម្លេង បរនិម្មិតវសវត្តីទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេង ឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

ព្រហ្មបារិសជ្ជានំ ទេវានំ សទ្ទំ សុត្វា ព្រហ្មបុរោហិតា ទេវា សទ្ទមនុស្សាវេសុំ ។

ព្រហ្មបុរោហិតាទេវតាទាំងឡាយ បានពួសម្ដេងព្រហ្មបារិសជ្ជា ទេវតាទាំងឡាយហើយ ក៏ញ៉ាំងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ៗ

ព្រហ្មបុរោហិតាធំនេកធំសម្ដំសុត្តា មហាព្រហ្ម-នេក សទ្ទមនុស្សាវេសុំ ។

មហាព្រហ្មាទេវតាទាំងឡាយ បានឮសម្លេងព្រហ្មបុរោហិតាទេវតាទាំងឡាយហើយ ក៏ញ៉ាំងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ៗ

មហាព្រហ្មាធំនេកធំសទ្ទំសុត្វា បរិត្តាភានេក សទ្ទ-មនុស្សាវេសុំ ។

បរិត្តាភាទេវតាទាំងឡាយ បានឮសម្លេង មហាព្រហ្មាទេវតាទាំងឡាយហើយ ក៏ញ៉ាំងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ៗ

បរិត្តាភាធំនេកធំសទ្ទំសុត្វា អប្បមាណាភានេក សទ្ទមនុស្សាវេសុំ ។

អប្បមាណាភាទេវតាទាំងឡាយ បានឮសម្លេងបរិត្តាភាទេវតាទាំងឡាយហើយ ក៏ញ៉ាំងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ៗ

អប្បមាណាភា ធំនេក ធំសន្និសុត្វា អាភស្សរា នេក សន្ធម្មធុស្សវេសុំ ។

អាភស្សរទេវតាទាំងឡាយ បានឮសម្លេង អប្បមាណាភាទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្តីសរសើរដូចគ្នា ។

អាភស្សរា ធំសន្និសុត្វា បរិត្តសុភា នេក សន្ធម្ម-ធុស្សវេសុំ ។

បរិត្តសុភាទេវតាទាំងឡាយ បានឮសម្លេង អាភស្សរទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្តីសរសើរដូចគ្នា ។

បរិត្តសុភា ធំនេក ធំសន្និសុត្វា អប្បមាណសុភា នេក សន្ធម្មធុស្សវេសុំ ។

អប្បមាណសុភាទេវតាទាំងឡាយ បានឮសម្លេងបរិត្តសុភាទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្តីសរសើរដូចគ្នា ។

អប្បមាណសុភា ធំនេក ធំសន្និសុត្វា សុភកិណ្ហកា-នេក សន្ធម្មធុស្សវេសុំ ។

សុភកិណ្ហាទេវតាទាំងឡាយ បានឮសម្លេងអប្បមាណសុភាទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេង ឲ្យលាន់ឮឡើងទៅ ដោយសេចក្តីសរសើរដូចគ្នា ។

សុភកិណ្ហានំទេវានំសទ្ទំសុត្វា វេហប្ផលាទេវា សទ្ទមនុស្សាវេសុំ ។

វេហប្ផលាទេវតាទាំងឡាយ បានឮសម្លេងសុភកិណ្ហាទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្តីសរសើរដូចគ្នា ។

វេហប្ផលានំទេវានំសទ្ទំសុត្វា អវិហាទេវា សទ្ទមនុស្សាវេសុំ ។

អវិហាទេវតាទាំងឡាយ បានឮសម្លេង វេហប្ផលាទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេង ឲ្យលាន់ឮឡើងទៅ ដោយសេចក្តីសរសើរដូចគ្នា ។

អវិហានំទេវានំសទ្ទំសុត្វា អតប្បាទេវា សទ្ទមនុស្សាវេសុំ ។

អតប្បាទេវតាទាំងឡាយ បានឮសម្លេងអវិហាទេវតាទាំងឡាយហើយ ក៏ញុំាងសម្លេងឲ្យលាន់ឮឡើងទៅ ដោយសេចក្តីសរសើរដូចគ្នា ។

អត្តប្បានំ ទេវានំ សទ្ទំ សុត្វា សុទស្សា ទេវា សទ្ទម-
នុស្សាវេសុំ ។

សុទស្សាទេវតាទាំងឡាយ បានឮសម្លេងអត្តប្បាទេវតាទាំងឡាយ ហើយ ក៏ញ៉ាំងសម្លេងឲ្យឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

សុទស្សានំ ទេវានំ សទ្ទំ សុត្វា សុទស្សី ទេវា សទ្ទ
នុស្សាវេសុំ ។

សុទស្សីទេវតាទាំងឡាយ បានឮសម្លេងសុទស្សាទេវតាទាំងឡាយ ហើយ ក៏ញ៉ាំងសម្លេងឲ្យឮឡើងទៅ ដោយសេចក្ដីសរសើរដូចគ្នា ។

សុទស្សីនំ ទេវានំ សទ្ទំ សុត្វា អកនិដ្ឋកា ទេវា
សទ្ទមនុស្សាវេសុំ ឯតម្ភគវតា ពារាណសិយំ ឥសិបត
នេ មិគទាយេ អនុត្តរំ ធម្មចក្កំ បវត្តិតំ អប្បដិវត្តិយំ សម-
ណេន វា ព្រាហ្មណេន វា ទេវេន វា មារេន វា
កេនចិ វា លោកស្មិន្តិ ។

អកនិដ្ឋកាទេវតាទាំងឡាយ បានឮសម្លេងសុទស្សីទេវតាទាំងឡាយ ហើយ ក៏ញ៉ាំងសម្លេងឲ្យឮឡើងទៅដូច្នេះថា ចក្រ គឺធម៌នេះនឹងរកចក្រណាមួយឲ្យក្រៃលែងជាងគ្មាន គឺសមណក្ដី ព្រាហ្មណ៍ក្ដី ទេវតាក្ដី មារក្ដី អ្នកណា ៗ ក្ដី ក្នុងលោកនឹងសម្ដែងពុំបានឡើយ ព្រះដ៏មានព្រះភាគ ព្រះ

អង្គត្រាស់ទេសនាហើយ ក្នុងឥសិបតនមិគទាយវ័ន ជិតក្រុងពារាណសី ។

ឥតិហ តេន ខណេន តេន មុហុត្តេន យាវព្រហ្មលោ- កា សទ្ទោ អព្ភុគ្គច្ឆិ ។

សម្លេងសាធុការឮឡើងទៅ ដរាបដល់ព្រហ្មលោក ក្នុងមួយខណៈ មួយស្របក់នោះ ដោយអាការលាន់ឮ ៗ គ្នាដូច្នេះ ។

អយញ្ច ទសសហស្សី លោកធាតុ សំកម្បិ សម្បកម្បិ សម្បវេធិ ។

មួយម៉ឺនលោកធាតុនេះ ក៏កក្រើកញាប់ញ័រតាំងខាងលើខាងក្រោម និងញាប់ញ័រក្នុងទិសទាំងពួង ។

អប្បមាណោ ច ឧឡារោ ឱភាសោ លោកេ បាតុរ- ហោសិ អតិក្កម្មេវ ទេវានំ ទេវានុភាវន្តិ ។

រស្មីដ៏រុងរឿងក្រៃពេក នឹងប្រមាណមិនបាន កន្លងលើសទេវានុភាព នៃទេវតាទាំងឡាយ ក៏កើតឡើងប្រាកដហើយ ក្នុងឧកាសលោកនេះ ។

អថខោ ភគវា ឧទានំ ឧទានេសិ អញ្ញាសិ វត ភោ កោ- ណ្ឌញ្ញោ អញ្ញាសិ វត ភោ កោណ្ឌញ្ញោ ។

ក្នុងលំដាប់នោះព្រះដ៏មានព្រះភាគទ្រង់បន្លឺនូវឧទានវាចាថា ម្នាលអ្នកដ៏ចម្រើន កោណ្ឌញ្ញព្រាហ្មណ៍គេបានចេះដឹងហើយហ្ន៎ ម្នាលអ្នកដ៏ចម្រើនកោណ្ឌញ្ញព្រាហ្មណ៍គេបានចេះដឹងហើយហ្ន៎ ។

ឥតិហិទំ អាយស្មតោ កោណ្ឌញ្ញស្ស អញ្ញាកោណ្ឌញ្ញោ ត្វេវ នាមំ អហោសីតិ ។

ព្រោះហេតុនេះឯង បានជាពាក្យថា អញ្ញាកោណ្ឌញ្ញជាប់មក ជាឈ្មោះនៃព្រះកោណ្ឌញ្ញដ៏មានអាយុ ។

## ធម្មចក្កប្បវត្តនសុត្តំនិដ្ឋិតំ

ព្រះធម្មចក្កប្បវត្តនសូត្រចប់បរិបូណ៌តែប៉ុណ្ណោះហោង

# សេចក្ដីពណ៌នា

តាមគោលខ្លះក្នុងសេចក្ដីអធិប្បាយរបស់លោក **ល្វី-ហ្វីណូត៍**

ដែលមានសារបានថា

## អំពីក្បាច់អលង្ការក្នុងប្រទេសឥណ្ឌូស៊ីន

## ម៉ាដឹមូអាហ្សែល ការប៉ុឡែស ពណ៌នាប្រាវត្ត

ក្រុមការ **ជុំ-ម៉ៅ** ប្រែចេញជាភាសាខ្មែរ

---

*លោកល្វី-ហ្វីណូត៍ ទើបនឹងតែងសេចក្ដី ១ ដាក់បោះពុម្ពក្នុងទស្សនាវដ្ដីបាកំងសែស ១ ខ្សែ សេចក្ដីនោះនឹងមានប្រយោជន៍ជាប្រាកដ ដល់អស់លោកអ្នក ដែលជាអ្នកមើលទស្សនាវដ្ដីកម្ពុជសុរិយាជាច្រើននាក់ ឯសេចក្ដីដែលលោកចាប់ប្រារព្ធផ្ដើមឡើងនោះ លោកធ្វើជាបុច្ឆាថាដូច្នេះ ៖*

*តើប្រទេសឥណ្ឌូស៊ីននេះ មានបំណាច់អ្វីចូលក្នុងរឿងការនៃក្បាច់អលង្ការក្នុងប្រទេសអាស៊ីដែរឬអ្វី ៗ ជាមុននឹងវិសជ្ជនាតាមពាក្យចោទនេះ លោក ល្វី-ហ្វីណូត៍ គាត់អធិប្បាយដោយត្រួស ៗ អំពីប្រទេសនានាក្នុងតំបន់ឥណ្ឌូស៊ីនបាកំងសែស ជាក្រោយដែលសារសព្វអំពីស្រុកអណ្ណាមដែលជាស្រុកធ្វើត្រាប់តាមបែបភាពស្រុកចិនគ្រប់សណ្ឋាន នោះលោកគាត់ចាប់និយាយពីស្រុកខ្មែរថាដូច្នេះ ៖*

*ប្រសិនបើយើងត្រឡប់ទៅរិះគិតអំពីប្រទេសឥណ្ឌូស៊ីនក្នុងជាន់ក្ដី*

វិញ នោះឃើញថាមានសេចក្ដីចាស់ជាធំណាស់ គឺអំពីសេចក្ដីឯករាជ្យនៃនគរនឹងដើមកំណើតក្បាច់អលង្ការ ។

ជាដើម គឺស្រុកឥណ្ឌាមិនដែលផ្សាយអំណាចក្រស័ត្រ ឬផ្សាយព្រះរាជអាណាចក្រទៅលើប្រទេសណា ១ សោះ ក្នុងតំបន់ជ្រោយធំត្រង់នេះ ជាសេចក្ដីដែលប្រាកដ ពិតមែនតែមានសេចក្ដីដំណឹងតមកដណ្ដប់ បំបាត់រឿងរ៉ាវដើម អំពីដែលស្រុកឥណ្ឌាផ្សាយព្រះរាជអាណាចក្រនោះ ឯកស្ដុតាងតែ ១ ដែលសល់នៅដល់នៅសព្វថ្ងៃ ហើយដែលនឹងទុកជាដំណឹងពិតមានអំពីការផ្សេង ១ ដែលពិតរបស់ស្រុក ដែលនៅក្នុងតំបន់ទន្លេមេគង្គជាមុនស្រុកខ្មែរទៅទៀត គឺជាស្រុកដែលមានឈ្មោះក្នុងសៀវភៅចិនហៅថាស្រុកហ្វូណន សេចក្ដីទាំងប៉ុន្មានក្នុងសៀវភៅនោះ មានអធិប្បាយអំពីរឿងរ៉ាវរបស់ស្រុកផង គឺតាមរឿងនោះមាននិយាយថា អ្នកដែលនាំនូវសេចក្ដីស៊ីវិល្ប មកផ្សាយក្នុងស្រុកហ្វូណន ហើយធ្វើស្ដេចដំបូងលើស្រុកនេះ គឺជាព្រាហ្មណ៍១រូប ឈ្មោះថា កៅណ្ឌិណ្យ ឬកោណ្ឌញ្ញ ដែលទេវតាប្រើឲ្យយកធ្នូដ៏មានឫទ្ធិ មកបង្ក្រាបមនុស្សជាតិក្នុងស្រុកនេះ ហើយបានយកស្ដេចក្សត្រីធ្វើជាអគ្គមហេសី ព្រមទាំងបង្ហាត់បង្រៀនអ្នកស្រុកឲ្យចេះស្លៀកដណ្ដប់សំពត់ ដែលគេប្រើនៅស្រុកកឹង្គ ក្នុងជាន់នោះសេចក្ដីស៊ីវិល្បរបស់ប្រទេសឥណ្ឌា ចូលមកផ្សាយជាដំបូងនោះ ប្រហែលជាក្នុងរវាងដើមគ្រិស្ដសករាជ ។

ប្រទេសហ្វូណន នៅចុកចើងជកបដល់មកឆ្នាំ ៦០០ ក្នុងពេលដែលស្រុកនេះកំពុងមានឥទ្ធិឫទ្ធិនោះ ផែនដីជាន់នោះធំទូលាយណាស់ គឺគ្របបញ្ចូលទាំងស្រុកខ្មែរ, ស្រុកសៀម, ស្រុកលាវ, ស្រុកកូសាំងស៊ីន, និងជ្រោយរបស់ជ្វា ១ ចំណែកទៀតផង ស្រុកហ្វូណនជាប្រទេសដីធំទូលាយណាស់ ធំជាងស្រុកខ្មែរក្នុងជាន់កណ្ដាលទៅទៀត ក្នុងជាន់នោះគេចេះធ្វើប្រាប់អលង្ការ ដោយឈើ និងដោយដែកមានរូបធ្វើពីសំរិទ្ធ និងគ្រឿងប្រើប្រាស់ជាដើម មិនបាច់ឆ្ងល់ថាក្នុងជាន់នោះគេចេះធ្វើផ្ទាក់ថ្ម ឡើយ ប៉ុន្តែមិនឃើញមានជាបែបផែនអ្វី សល់នៅឲ្យយើងឃើញថ្វីដៃដើមនោះទេ តែថាបើយើងពិចារណាតាមបែបរចនា ដែលជារបស់បុរាណក្នុងស្រុកខ្មែរ, ក្នុងស្រុកសៀម, និងទុកដំបន់ជ្រោយស្រុកជ្វានោះ យើងនឹងសន្និដ្ឋានថាស្រុកទាំង ៣ នេះ ការរចនាមានបែបនិងមានគោលដើមតែម្យ៉ាង ហើយឯគោលដើមនោះ គឺកើតនៅស្រុកហ្វូណននោះឯង ឯមកទាំងប៉ុន្មានដែលបែកចេញពីស្រុកហ្វូណនទៅនោះឃើញថាស្រុកខ្មែរនេះឯង ដែលមានសេចក្ដីចម្រើនឡើងជាងគេ ហើយដែលជាប់អង្វែងតមកដល់សព្វថ្ងៃនេះ ឯប្រាសាទជាន់ដើម ដែលគង់ទ្រង់នៅខ្លះនោះ គេបានសាងក្នុងរវាងឆ្នាំ ៧០០ គឺប្រាសាទធម្មតាដែលសាងពីឥដ្ឋ ប៉ុន្តែតាមដែលគេពិនិត្យបញ្ជាក់អំពីបែបផ្សេង ១ ដែលកសាងតាមដោយក្បាច់ចម្លាក់ ដែលរចនាជាលំអ តាមដោយផែនទីត្រូវក្បួន

ខ្នាតនោះ ឃើញថាក្នុងជាន់នោះមានកើតសាលារចនាយ៉ាងធំ ក្នុងក្បាច់ចម្លាក់ឃើញមានរូបដែល មានទ្រង់ទ្រាយយ៉ាងចំណាប់ជាភាពមនុស្សមែន ហើយឃើញសរសៃដែលនៅរាងក្នុងខ្លួន បានពិនិត្យការតាំងនេះទៅ ឃើញថា ក្នុងជាន់នោះក្បាច់អលង្ការមានបែបផែន ឬមានថ្នាក់ស្មើនឹងបែបផែនក្នុងជាន់ដែលគេសិក្សាក្នុងគ្រាក្រោយ គួរតែយើងយករូបទេវតាដែលមានដៃ ៤ នៅប្រាសាទដំរីក្រាប និងរូបព្រះហរិហរ ២ អង្គដែលនៅឯមន្ទីរអាលប៊ែរសារ៉ូនៅក្រុងភ្នំពេញ និងនៅឯមន្ទីរគីមេនៅស្រុកប៉ារិស[1]យកជាតាងក្នុងការរចនាជាន់ដើមនោះ ឃើញយកបែបក្បួនជាច្រើនជាងការជាន់ក្រោយៗមកទៀត ឯព្រះពុទ្ធរូបនៅវត្តរលោកជារូបដែលមានភាពនិងសណ្ឋានជាកើតមុនគេបង្អស់នោះ ឃើញថាបែបដែលកសាងនោះ គឺគ្រាប់តាមសុទ្ធសាធអំពីបែបក្បួនមក ។

ការរចនាក្នុងជាន់នោះមិនសាបសូន្យសោះឡើយ គឺនៅមានសេចក្ដីចម្រើន ក្នុងរវាងកំណត់ប្រហែល ៧០០ ឆ្នាំ គឺថាតពីជាន់ដើមនោះមកមានកសាងប្រាសាទជាច្រើនណាស់ពាសពេញដីក្នុងស្រុកខ្មែរ ។

ការរចនាដែលចម្រើនជាងគេនោះ គឺការដែលសាងប្រាសាទផ្សេងៗ

---

១- មើលសៀវភៅលោក ហង់រី-ប៉ារម៉ង់ទេ អំពីក្បាច់ខ្មែរជាន់ដើម បោះពុម្ពនៅក្រុងប៉ារីសឆ្នាំ ១៩២៧ រូបលេខ ៨៤-៨៧-១១០ និងសៀវភៅលោក វិក-ទ័រ-គោលូបែវ អំពីហរនៃមហាឫស្សី បោះពុម្ពនៅប៉ារីស ពីឆ្នាំ ១៩២៥ ខ្សែ ១ ទំព័រ ២៨៥ សៀវភៅទាំង ២ ក្បាលនេះ មាននៅក្នុងព្រះរាជបណ្ណាល័យកម្ពុជា ។

អំពីថ្មបាយក្រៀម ដោយកន្លែងជាន់នោះគេធ្វើត្រឹមត្រូវហាក់បត់តាមក្បូនខ្នាត ហើយទីកន្លែងដែលសាងប្រាសាទឲ្យមានជាម្ហាក់ៗឡើង ព្រមដោយកេងថែវជុំវិញហ៊ុំព័ទ្ធប្រាសាទអង្គរវត្ត ដែលសាងក្នុងរវាងឆ្នាំ ១៦០០ នោះ ជាការឧត្តមយ៉ាងឯកប្រកែកមិនបាន ហើយតពីជាន់អង្គរវត្តជាយូរមកទៀត គឺដល់មកក្នុងពេលដែលគេស្មានថាការបេងាខ្មែរ ប្រាសចាកពោះបង់ស្រុកខ្មែរហើយនោះ នៅឃើញមានប្រាសាទតូច១ទៀតហៅថាឥសនបុរ (បន្ទាយស្រី) ដែលគេកសាងក្នុងរវាងផុតឆ្នាំ ១៣០០ ប្រាសាទនោះមានក្បាច់ចម្លាក់ប្រកបដោយសណ្ឋានថ្មីៗ ជាច្រើនយ៉ាង ដូចជាកន្សុខ, ទឹកមុខ និងកាយវិការដៃជើង លុះដល់មកកាលក្តីប្រែ ដែលជាទីនាំឲ្យបាត់ឲ្យពោះបង់ការដ៏ប្រសើរចេញ នោះស្រុកខ្មែរក៏មានការបេងាសម្រាប់ស្រុកម្យ៉ាងទៀត ដែលមានបែបផែនថ្មី ហើយដែលបានចម្រើនជាថ្មីឡើងដែរ ។

រួចពីនោះមក លោក ល្វី ហ្វ៊ី ណូត៍ អធិប្បាយអំពីស្រុកចម្ប៉ាទីងស្រុកលាវតទៅទៀត ហើយជាមុននឹងដល់ទៅសេចក្តីបញ្ចប់ ដែលលោកអធិប្បាយត្រួសៗអំពីការបេងាបស់ប្រទេសឥណ្ឌូស៊ីននោះ លោកបានពណ៌នាក្នុងចំពូក ១ យ៉ាងវិ អំពីភាពសណ្ឋានសព្វថ្ងៃនៃក្បាច់បេងាក្នុងប្រទេសឥណ្ឌូស៊ីន ។

ឯសេចក្តីដែលជាមានប្រយោជន៍ដល់យើងនោះ គឺសេចក្តីដែលលោក

អធិប្បាយអំពីស្រុកខ្មែរ លោកបានពិនិត្យឃើញថាជាតិខ្មែរមិនបាត់អស់សេចក្តីប៉ិនប្រសប់ សេចក្តីចំណានក្នុងការរចនាឡើយ ហើយថាដោយបានតាំងបង្កើតសាលារចនាខ្មែរឡើង ក៏ជាតិខ្មែរបានចម្រើនថ្កុំថ្កើងឡើងក្នុងក្បាច់អលង្ការ ប៉ុន្តែជាការគួរឲ្យស្តាយ ឬជាការតែតក៏ពួលណាស់ ដែលបានពិនិត្យឃើញអស់ទាំងវត្តចាស់ៗ ដែលបានសាងពីដើមមកឬវត្តថ្មីដែលទើបនឹងសាង នោះធ្វើបំពានឲ្យខូចអន្តរាយ ដល់ការរចនាក្នុងស្រុកខ្មែរជាច្រើន ដែលសុទ្ធតែជារឿងពាក់ក្នុងព្រះពុទ្ធសាសនា ហើយនៅវេលាដែលយើងដើរមើលរបៀបវត្តនានា ក្នុងស្រុកខ្មែរ យើងបានពិនិត្យឃើញដូច្នេះដែរ ។

គួរឲ្យមានសេចក្តីស្តាយជាអនេក ដែលបានឃើញសេចក្តីចំរើនដែលបានឃើញចេតនាជាកុសល និងចំនួនប្រាក់ចេញចាយទៅ ដើម្បីទៅជួសជុលប្រាសាទបុរាណដែលនៅក្នុងកំផែង ឬក៏ជញ្ជូនយកថ្មបុរាណទៅកសាងជាព្រះវិហារថ្មី ១ ឡើង ឬម្យ៉ាងទៀតកសាងព្រះវិហារ ១ ថ្មីដោយស៊ីម៉ង់ត៍ ឥតរិះគិតដល់ក្បាច់អលង្ការ ។

ដែលជាខ្លឹមសារនោះ ត្រូវឲ្យជាតិខ្មែរទាំងអ្នកបួសទាំងគ្រហស្ថយល់ច្បាស់ប្រាកដក្នុងវេលានេះថាជាកិច្ចដ៏ធំ ១ ក្នុងសាសនា ដែលទទួលកោតខ្លាចដល់ប្រាសាទបុរាណ គឺថាបើបុរាណស្ថានណា មានភាពសណ្ឋានយ៉ាងដូចម្តេច ត្រូវបណ្តោយឲ្យនៅ តាមបែបយ៉ាងនោះ ការដែលយក

ស៊ីម៉ង់ត៍ទៅប៉ះ ឬ ទៅជួសជុលផ្លាស់ភាពផ្សេងទៅវិញ នោះមានទោសធ្ងន់ប្រហែលគ្នានឹងបំពានឬបំបាត់លំអៀងព្រះពុទ្ធដីកាដូច្នោះដែរ ។

ត្រូវហាមកុំឲ្យអ្នកឯណាទៅធ្វើ ឲ្យបាក់បែកក្បាច់រំលេចរបស់បុរាណ ត្រូវឲ្យថ្ម ១ ដុំ ឬឥដ្ឋ ១ ដុំ នៅនឹងនៅកន្លែងចាស់ជាដរាប នេះហើយជាកិច្ចធុរៈ ដ៏ឧត្តមរបស់ជនដែលនៅជិតប្រាសាទបុរាណ ។

បានជាយើងទទូចនិយាយត្រង់កន្លែងនេះ ព្រោះថាមិនត្រូវជាតិខ្មែរភ្លេចកេរ្តិ៍របស់គោត្រខ្លួន ដោយហេតុនេះចំពោះនឹងផ្លូវធម៌ មិនត្រូវធ្វើឲ្យប្រែប្រួល ឬបង្ហិនបំផ្លាញបុរាណស្ថានទាំងនោះឡើយ ។

ឯកិរិយាដែលសាងសាលា ឬសាងវិហារ ជិតដិតមិនទុកប្រឡោះឲ្យឃ្លាតឆ្ងាយជុំវិញប្រាសាទបុរាណ នោះមានទោសប្រហែលគ្នានឹងមិនកោតខ្លាច ដល់គំនិតស្មារតីនៃជីតា-ជីដូនរបស់ខ្លួន តើហេតុអ្វីបានជាមានទោស ឆ្លើយថា បានជាមានទោសព្រោះការដែលសាងថ្មី ដោយស៊ីម៉ង់ត៍កងកំពេលនោះ ហាក់ដូចជាទៅសង្កត់របស់ដែលល្អ ជាថ្វីដៃជាងបុរាណខ្មែរទៅ ។

នៅមានការម្យ៉ាងទៀត ដែលនាំឲ្យពិបាកដល់ភ្នែកអ្នកដែលចូលទៅថ្វាយបង្គំព្រះពុទ្ធរូបក្នុងព្រះវិហារនីមួយ ៗ គឺដែលឃើញទីអាសនៈមានរចនាតាំងដោយគ្រឿងផ្សេង ៗ នោះឯងមានមនុស្សជាច្រើនគិតថា ដែលនឹងថែទាំវត្តអារាម ព្រះវិហារសីមាកុដិឲ្យបានស្អាតនោះ ត្រូវឲ្យមានប្រាក់

ច្រើនទើបធ្វើបាន ដែលយល់យ៉ាងដូច្នេះ នេះពេញជាខុសទទេសោះ ដែលត្រូវធ្វើជាដើមនោះត្រូវធ្វើឲ្យស្អាត ហើយឲ្យជារបស់ធម្មតាប៉ុណ្ណោះ មិនត្រូវធ្វើដូចម្តេចទៅទៀតឡើយ ។

តើគេប្រទះឃើញអ្វីខ្លះ នៅលើទីអាសនៈក្បែរព្រះពុទ្ធរូបផ្សេងៗ ។ គឺ ឃើញគំនរផ្កាដែលធ្វើដោយក្រដាសជាប់ធូលីពាសពេញ ឃើញវត្ថុផ្សេងៗ ដែលធ្វើដោយបាន ផ្ញើមកអំពីប្រទេសអឺរ៉ុប ឃើញចង្កៀងស្ពាន់ដែលធ្វើជាបែបភាពមានរូបផ្សេង ៗ ឃើញច័ត្រដែលគេធ្វើសម្រាប់បាំង រូបកូនក្រមុំជារបស់សម្រាប់ល្បែងក្មេងនៅប្រទេសអឺរ៉ុប ដែលមិនមែនជារស់ស្កុកស្កមសំណំសំនួនដូចយ៉ាងក្ដស់ ដែលបើកបាំងព្រះពុទ្ធរូបខ្លះនោះឡើយ ។

ម្យ៉ាងវិញទៀតឃើញថាជាការឥតប្រយោជន៍សោះ ដែលបណ្ដោយឲ្យទៀនស្រក់ជិតជាប់ទៅលើទីអាសនៈ ហើយកំទេចធូបធ្លាក់ពាសពេញទៅ ព្រមទាំងសម្បកប្តូមងពីងពាងព័ទ្ធដេរដាសទៅក្នុងទីអាសនៈនោះ ឯទីអាសនៈដែលតាំងត្រូវទំនងទំនៀមទម្លាប់ឬត្រូវក្បួនខ្នាតនោះត្រូវតម្រៀបព្រះពុទ្ធរូបឲ្យមានរបៀបមានជួរដំត្រឹមត្រូវ ហើយយកដើមឈើរស់ដែលដាំដោយផើង យកមកតាំងឲ្យមានរបៀបរាបសា កុំឲ្យទើសទែងដល់ភ្នែក ហើយថែទាំឲ្យស្អាតល្អ នោះទើបទីងមើលទៅឃើញ ជារបស់ថ្លៃថ្លាដ៏ប្រសើរត្រូវតាមសណ្ដាប់ធ្នាប់ ព្រះពុទ្ធបវេណីពីបុរាណរៀងមក ។



# អំពីសាលាបារាំងសែសនៅបុងបូញ៉ាប្រទេស

ក្រុមការ ជុំ-ម៉ៅ

ប្រែពីភាសាបារាំងសែស មកជាខេមរភាសា

---

ប្រទេសឥណ្ឌូស៊ីនមិនមែនជាស្រុកថ្មីទេ គឺជាស្រុកដែលមានពង្សាវតារជាយូរអង្វែងណាស់មកហើយ ដូចមានគម្ពីរដីកាផ្សេងៗ នៅក្នុងហោត្រ័យជាតាងស្រាប់ មួយអន្លើនឹងសិលាចារឹកនៃប្រាសាទទាំងឡាយ និងសសរថ្មបុរាណដែលនៅឈរសព្វថ្ងៃនៅឡើយ ឬដែលកប់បាត់នៅក្រោមផ្ទាំងដែលទ្រុឌទ្រោមទៅ ដោយអំណាចចារឹកនិងអក្សរទាំងនេះ ទើបពង្សាវតារបុរាណបានទុកស្នាមជានឲ្យយើងដឹងអំពីជាតិផ្សេងៗ និងភាសាដែលមាននៅក្នុងស្រុកនោះ ហើយចបដែលកាប់គាស់បានប្រទះជាញយៗនៅក្នុងដី គ្រឿងប្រដាប់បុរាណពីថ្មស្អាត គ្រឿងតែងកាយពីខ្ចង និងគ្រឿងប្រដាប់ចម្លែកៗ ពីស្ពាន់ ដែលជាសំអាងនាំឲ្យដឹងសេចក្ដីស៊ីវិល្ស ក្នុងជាន់ដំបូង ប៉ុន្តែរបស់ដែលប៉ះពាល់ដល់ភ្នែកជាងគេនោះ គឺប្រាសាទបុរាណដែលមានចំនួនជាច្រើនរចនាដោយចម្លាក់ដ៏វិចិត្រ គួរជាទីកោតជាទីស្រឡាញ់រាប់អាន ដែលមាននៅលើដីបុរាណនោះ ហើយមានប្រាសាទបុរាណខ្លះ ក្នុងពួកនោះល្អឆើតជាងគេទាំងអស់ ក្នុងទ្វីបអាស៊ី វេលាដែលបានមកកាន់កាប់ទំនុកបំរុងស្រុកឥណ្ឌូស៊ីននោះ ក្រុងបារាំងសែសទទួលបន្ទុកថែទាំនូវរបស់ទាំងនេះ មិនឲ្យអន្តរាយឡើយ ដែលក្រុង

បារាំងសែសបានមកតាំងនៅជាដំបូងនោះ កិច្ចទាំងឡាយនេះ ក៏បាន សម្រេចធ្វើឡើងបានដោយពួកមិស្សិនមួយក្រុម គឺឌូដាត់ដឺឡាគ្រេ និង ហ្វ្រង់ស៊ីការនីញេ, លូវីដឺឡាពត់, អេទៀនអេម៉ូនីញេ, អូគុស្តប៉ាវី ទៅ ធ្វើការបានចម្រើនដ៏ប្រសើរក្នុងកិច្ចពិនិត្យទូរផែនដី ប៉ុន្តែពួកមិស្សិនតែ ប៉ុណ្ណោះ ដែលបានតាំងបង្កើតក្នុងជាន់នោះ មិនទាន់គួរល្មមនៅឡើយ ដោយការដែលរិះរកតាមក្បួនខ្នាត សេចក្តីសិក្សាយ៉ាងជ្រៅនៃពង្សាវ-តារនិងការដែលរក្សានៃប្រាសាទបុរាណនោះ ត្រូវការឲ្យមានតាំងបង្កើត ជាក្រសួង ១ ជាប់ជាចិរទ្រព្យ ដោយហេតុទាំងនេះហើយ ទើបបាន តាំងបង្កើតសាលាបារាំងសែសនៅចុងបូព៌ាប្រទេស ។

## អំពីសាងសាលា

សាលានេះ បានតាំងបង្កើតឡើងដោយប្រកាសអាររេតេ១ច្បាប់ ពី លោកគូវែរណឺរ ហ្សេណេរ៉ាល ប្រទេសឥណ្ឌូស៊ិន នាមប៉ូលឌូមែរ ចុះ ថ្ងៃ ១៥ ដេសម ឆ្នាំ ១៨៩៨ ក្នុងវេលានោះសាលានេះមាននាមថា សា-លាពិនិត្យក្បាច់អលង្ការ ក្នុងប្រទេសឥណ្ឌូស៊ិន លុះ ១ ឆ្នាំ តពីនោះមក ដើម្បីនឹងពង្រីកមុខក្រសួងសិក្សាឲ្យធំទូលាយទៅទៀតនោះ បានឲ្យនាម សាលាដូចសព្វថ្ងៃនេះ ហៅថា សាលាបារាំងសែសនៅចុងបូព៌ាប្រទេស (ប្រកាសអាររេតេ ចុះថ្ងៃ ២០ ខែ យ៉ាំងវីយេរ ឆ្នាំ ១៩២០) ។

មុខក្រសួងជាដាច់ខាត របស់សាលានេះ បានសម្រេចដោយប្រកាសដេក្រេលោកប្រេស៊ីដង់ ដឺឡារេពុព្លិក ចុះថ្ងៃ ២៦ ហ្វេវ្រីយេរ ឆ្នាំ ១៩០១ ក្រោយទៀតមានប្រកាសដេក្រេ ១ ច្បាប់ ចុះថ្ងៃ ៣ ខែអាព្រិល ឆ្នាំ ១៩២០ បញ្ញត្តិតាមសេចក្តីពិតមានពីលោក អាល់បែរសារ៉ូ ជាសេនាបតីក្រសួងស្រុកចំណុះ និងដោយសេចក្តីយល់ព្រមពីលោក គូវែរណ័រ ហ្ស៊េណេរ៉ាល់ ឲ្យប្រគល់នូវអត្តភាពដោយសន្ធតមកសាលានេះ រាប់តាំងពីថ្ងៃ ១ យ៉ាំងវីយេរ ឆ្នាំ ១៩២១ តមក ។

## អំពីលំនៅរបស់សាលា

នៅវេលាដែលបង្កើតសាលានោះ ទីប្រជុំកងការធំក្នុងប្រទេសឥណ្ឌូស៊ីននៅក្រុងព្រៃនគរនៅឡើយទេ នៅទីនោះហើយដែលគេបានតាំងហោសៀវភៅនិងសារមន្ទីរ ប៉ុន្តែដល់មកក្នុងឆ្នាំ ១៩០១ ទីប្រជុំកងការធំក៏ផ្លាស់ទៅតាំងឯក្រុងហាណូយវិញ ហើយឯសាលាបារាំងសេសនៅចុងបូព៌ាប្រទេស ក៏ផ្លាស់ទៅតាមក្រសួងកងការឯទៀតដែរ ឯមន្ទីរដែលមានរចនាដោយថ្ម ហើយដែលនឹងរើរុះទៅនាំឲ្យអន្តរាយនោះ បានទុកនៅក្រុងព្រៃនគរ បាននាំយកតែហោសៀវភៅទៅតាំងឯក្រុងហាណូយ កាលពីឆ្នាំ ១៩០២ មួយអន្លើនឹងអក្ខរចារឹកផ្សេងៗ ជាអក្សរចិន និងអក្សរសាសន៍ឯទៀត ចារឹកទាំងប៉ុន្មាននេះបានយកទៅតាំងក្នុងឱកាសប្រឡងដែលបើកនៅក្នុងក្រុងនេះកាលពីថ្ងៃ ១៦ ណោវ៉ែម លុះ

ដល់បង្ហើយឈប់ប្រឡងពីថ្ងៃ ១៩ ហ្វេវ្រីយេរ ឆ្នាំ ១៩០៣ របស់ទាំងប៉ុន្មាននេះបានយកទៅទុកក្នុងរោងដែលជាសារមន្ទីរ សម្រាប់សាលាសព្វថ្ងៃនេះឯង ប៉ុន្តែក្នុងកាលនោះ គេមិនទាន់ពេញចិត្តនឹងមន្ទីរនេះសោះ ព្រោះជាមន្ទីរដែលគេសម្រាប់ទុកតាំងរបស់ធម្មតាដូចជាផល កេរ្យត្រាធិការ និងផលសិប្បិយការដូច្នោះ ហើយទៅយកធ្វើជាមន្ទីរសម្រាប់តាំងក្បាច់អលង្ការវិញ ទុកជារបៀបរបស់ដោយប្រុងប្រយ័ត្នដូចម្តេច ក៏ហាក់ដូចជានៅមិនគត់មត់ឲ្យផុតអំពីសេចក្តីអន្តរាយសោះ ហើយសេចក្តីដែលសង្ស័យក្នុងចិត្តនេះមានឃើញហេតុកើតឡើងមែនមិនយូរប៉ុន្មាន កាលពីថ្ងៃ ៧ យូរាំង ឆ្នាំ ១៩០៣ មានព្យុះយ៉ាងធំពារលើក្រុងហាណូយ ធ្វើឲ្យរបើកទ្វារដែកយ៉ាងធ្ងន់ៗ ដែលបិទជ្រុងរោងតាំងសងខាងចូលដល់ទៅខាងក្នុងដែលជាទីតម្កល់នូវគ្រឿងតាំងរបស់សាលា អក្ខរចារឹកគ្រប់ភាសាក៏ខ្ទេចខ្ទីអស់ គ្រឿងដែលធ្វើពីដីសក៏បាក់បែកអន្តរាយ ហើយឯរបស់ដែលគួរនឹងថ្នាំក៏រសាត់ទៅតាមខ្សែទឹកទៅ សេចក្តីពិសោធល្បងមើលដូចខាងក្រោយនេះហាក់ដូចជាស្រួលល្អ គឺគេដកយករបស់ទាំងប៉ុន្មានដែលគង់សល់នៅពីក្នុងរោងមុន ហើយយកទៅតម្កល់ទុកនៅកន្លែង ១ ដែលបានសុខជាង ។

កាលក្នុងឆ្នាំ ១៩០៤ រាជការគូវែរណឺម៉ង់ ហ្សេណេរ៉ាល បានធ្វើអំណោយដីមួយកន្លែងនៅជ្រុងផ្លូវការូ និងផ្លូវហាងរីវៃយ មកឲ្យសាលា

កន្លែងនោះសាលាបានកាន់កាប់ដរាបដល់សព្វថ្ងៃនេះឯង លុះដល់មកក្នុងឆ្នាំក្រោយទៀតគឺឆ្នាំ ១៩០៥ សារមន្ទីរនិងកន្លែងធ្វើការ បានផ្លាស់ទៅនៅជាមួយនឹងមន្ទីរធំ ដែលមានសាងគេហស្ថាន ១ ទៀតភ្ជាប់នៅទីនោះ សម្រាប់លោកចាងហ្វាងសាលា ហើយគេហស្ថាន ១ ទៀតសម្រាប់អ្នកសិក្សា ( កាលពីឆ្នាំ ១៩០៦ ) និងហាង ១ ជាក្រោយកាលពីឆ្នាំ ១៩១២ ប្រជុំគេហស្ថានទាំងប៉ុន្មាននេះ មិនទាន់ជួនល្មមដល់សាលា ដើម្បីផ្តល់នូវប្រដាប់ចេនានៅឡើយ សេចក្តីដែលខ្វះនេះបានបំពេញ ឲ្យគ្រប់ឡើងដោយប្រកាសអារេតេ ១ ច្បាប់ ចុះថ្ងៃទី ២៨ យ៉ាំងវីយេរ ឆ្នាំ ១៩០៩ ដែលបានភ្ជាប់មកសារមន្ទីរនេះទៀត គេហស្ថានសម្រាប់ធ្វើការធំ ១ នៅផ្លូវកុងសែសស្យុង ដែលសាលាប្រជុំស្រុកឥណ្ឌូស៊ីនបានកាន់កាប់ជាក្រោយបង្អស់ ដូចនេះហើយសាលាបារាំងសែសនៅចុងបូព៌ាប្រទេស ក៏បានតាក់តែងរៀបចំហើយជាស្រេច នៅក្នុងឆ្នាំគំរប់ទី ១០ តាំងពីកើតសាលានេះឡើង ។

## អំពីតាំងបង្កើតសាលា

សាលាបារាំងសែសនៅចុងបូព៌ាប្រទេស មិនមែនជាសាលាបង្រៀនទេ គឺគ្រាន់តែជាទីសម្រាប់រៀបរកតម្រាវការ ក្បាច់អលង្ការនិងភាសាផ្សេង ៗ នៅក្នុងឥណ្ឌូស៊ីននិងនៅដែនដីនានា ឯទៀតក្នុងដំបន់ចុងបូព៌ាប្រទេស គឺស្រុកឥណ្ឌា, ស្រុកចិន, ស្រុកជប៉ុន និងស្រុកឥណ្ឌូស៊ីន ។

អ្នកពជការសម្រាប់សាលានោះ មានចាងហ្វាងម្នាក់ដែលតាំងដោយប្រកាសដេក្រេ និងម៉ឺមជាច្រើនដែលបំពេញកិច្ចក្រសួងដោយពេលវេរ ឬជាអចិន្ត្រៃយ៍ ហើយដែលតាំងដោយប្រកាសអារេតេលោកគូវែរណើរ ហ្សេណេរ៉ាល តាមសេចក្ដីតម្រូវពីក្រុមអ័កកាដេមីដេសាំងស្រ្កិបស្យុង អេបែលឡែត្រ ។

ក្រុមអ័កកាដេមីនេះ ត្រូវត្រួតត្រាសាលានេះ ដោយវិទ្យាសាស្ត្រ ដោយមានក្រុមកុំមីស្យុង១ ក្រុមដោយឡែកទៀត ត្រូវទទួលនិងបញ្ជូនអ្នកសិក្សាដែលត្រូវប្រឡងវិជ្ជា ត្រូវធ្វើតាមលំអានការតាំងឡាយ ត្រូវជួបជុំនឹងលោកចាងហ្វាង អំពីគំនិតផ្សេង ៗ របស់ក្រុមនេះ ហើយជូនដំណឹងដល់លោកគូវែរណើរ ហ្សេណេរ៉ាល អំពីសេចក្ដីយល់ឃើញរបស់ខ្លួន ក្នុងការជាប្រយោជន៍ដល់សាលានេះ ។

ឯពួកម៉ឺម ដែលបំពេញកិច្ចក្រសួងដោយពេលវេរនោះ កាលដើមហៅថាអ្នកសិក្សា ពួកនេះតាមធម្មតាសុទ្ធតែជាបណ្ដាសិស្ស ដែលបានសញ្ញាប័ត្រពីសាលាឧត្ដមសិក្សាមក ដែលបានហាត់រៀននូវភាសាផ្សេង ៗ សម្រាប់បូព៌ាប្រទេស ឬដែលបានហាត់រៀនក្បាច់អលង្ការ ប៉ែកខាងសាងគេហស្ថានដោយក្បួនខ្នាត ហើយដែលបានចូលកាន់ការខាងវិទ្យា-សាស្ត្រ គឺក្នុងផ្លូវដែលចេះដឹងខាងភាសា ពង្សាវតារនិងទំនៀមទម្លាប់ក្នុងបូព៌ាប្រទេស និងការដែលចេះដឹង អំពីក្បាច់អលង្ការប៉ុន្តែតាមផ្លូវច្បាប់

គ្មាននិយាយអំពីស្ថានដូចម្ដេច ដែលត្រូវឲ្យទទួលយកពួកទាំងនេះឡើយ ហើយមិនមែនកំណត់យកតែជាតិបារាំងសែសទេ គឺគេពិនិត្យតែអំពីការដែលបានធ្វើឲ្យចម្រើនដល់សាលានិងដល់វិជ្ជា ចំនួនមីមទាំងនេះ តាមលក្ខណបញ្ញត្តិថាត្រូវឲ្យមានត្រឹមតែ ៣ នាក់ ហើយម្នាក់ៗ បានតាំងតែត្រឹមកំណត់ ៩ ឆ្នាំទេ ប៉ុន្តែកំណត់នេះ នឹងចម្រើនឲ្យយូរ ១ ឆ្នាំៗ តៗទៅទៀតបាន តាមសេចក្ដីតម្រូវនៃលោកចាងហ្វាង នឹងតាមសេចក្ដីយល់ឃើញនៃក្រុមអាកាដេមី ។

ឯពួកមីមជាអចិន្ត្រៃយ៍ កាលដើម ដែលហៅថាជាពួកគ្រូនោះរបៀបដែលតាំងមានលំអាន ដូចជាមីមដែលបំពេញកិច្ចក្រសួងដោយកាលវេរដែរ ប៉ុន្តែគ្មានកំណត់ឆ្នាំឡើយ ពួកមីមទាំងនេះ ត្រូវនៅក្នុងលក្ខណបញ្ញត្តិផ្សេងនៃពួកអ្នកពណការ បែបដូចនេះ អំពីឈប់សម្រាកកម្លាំង អំពីយានជំនិះនឹងអំពីឈប់ទទួលរង្វាន់រើត្រែត ។ល។ តាមធម្មតាបណ្ដាមីមទាំងនេះ សុទ្ធតែរើសយកខ្លួនក្នុងពួកមីម ដែលបំពេញកិច្ចក្រសួងដោយពេលវេរ ហើយដែលមានកិត្តិនាមថាជាអ្នកពណការមានតម្លៃដ៏ខ្ពស់ ឆ្លៀវឆ្លាតក្នុងវិទ្យាសាស្ត្រ ក្នុងគ្រាសម័យដែលបានធ្វើពណការ ជាយូរឆ្នាំមកក្នុងសាលានេះ ។

ពួកមីមជាអចិន្ត្រៃយ៍ទាំងនេះ មានកន្លែងនៅក្នុងតំបន់ផ្សេងៗពីគ្នា ដែលជាកេរ្តិ៍របស់សាលា គឺតំបន់ស្រុកចិន និងស្រុកយួនទាំង ស្រុក

ឥណ្ឌូ និងស្រុកដែលមានប្រភេទឥណ្ឌូ ១ ស្រុកជប៉ុន ១ និងការរិះរកខាងក្បាច់អលង្ការក្នុងប្រទេសឥណ្ឌូស៊ីន ១ ចំណែកខាងក្រោយនេះ មានបង្កើតជាក្រុមកងការផ្សេងដោយឡែក ១ ដែលមាននាមថាក្រសួងក្បាច់អលង្ការ ក្នុងក្រសួងនេះមានម៉ឺមជាអចិន្ត្រៃយ៍ ដែលមានសក្តិធំម្នាក់ជានាយកដែលមានងារជាចាងហ្វាងក្រសួងក្បាច់អលង្ការ ហើយដែលមានម៉ឺមផ្សេង ៗ ទៀតនៅក្រោមបង្គាប់ បំពេញមុខក្រសួងជាអ្នកថែរក្សាប្រជុំប្រាសាទអង្គរ ឬជាអ្នកត្រួតត្រាប្រាសាទបុរាណក្នុងប្រទេសផ្សេង ៗ ក្នុងដែនឥណ្ឌូស៊ីនបារាំងសែស ។

ក្រៅពីពួកម៉ឺមជាអចិន្ត្រៃយ៍ និងម៉ឺមដែលបំពេញកិច្ចក្រសួងដោយកាលវេរនោះ សាលាមានភ្នាក់ងារផ្សេងទៀតនៅក្នុងស្រុកចំណុះ និងក្នុងប្រទេសក្រៅ ហៅថាអ្នកឧបត្ថម្ភការបួល ឯងារអ្នកឧបត្ថម្ភការបួលនោះ លោកគូវែរណើរ ហ្សេណេរ៉ាល់ អនុញ្ញាតឲ្យដល់បណ្ដាអ្នកដែលធ្វើកិច្ចការជាប្រយោជន៍សាលានេះដោយការរិះរក ដោយអំណោយឬដោយការអ្វីផ្សេងទៀត ភ្នាក់ងារនេះបំពេញកិច្ចក្រសួងបានត្រឹម ៣ ឆ្នាំ ប៉ុន្តែនឹងតាំងជាថ្មី ៣ ឆ្នាំម្ដងៗតរៀងទៅទៀត បានឥតមានកំណត់ ។

ត្រូវសម្គាល់ម្យ៉ាងទៀតថា លោកគូវែរណើរ ហ្សេណេរ៉ាល់ បានដាក់ប្រាក់ទៅក្រសួងសិក្សាធិការកាលពីឆ្នាំ ១៩១៧ ដើម្បីសាងមន្ទីរមួយក្នុងសាលាគូឡែសក្នុងក្រុងបារាំងសែស សម្រាប់តម្កល់ពង្សាវតារនិង

លំអានការសាក្នុងប្រទេសឥណ្ឌូស៊ីន ហើយរូបអ្នកដែលកាន់កាប់វត្ថុទាំងនេះត្រូវធ្វើជាអ្នកដំណាងសាលានេះ ចំពោះនឹងក្រុងបារាំងសេសផង ។

ឯអ្នកពងការជាតិអាស៊ីអាទិក ដែលធ្វើពងការក្នុងសាលានោះ មានសៀម ខ្មែរ ចិនជាងគំនូរ បណ្ដាពួកទាំងនេះមានខ្លះជាជាតិក្នុងស្រុកឥណ្ឌូស៊ីន ។



# អំពីហោសៀវភៅ

ប្រដាប់ដែលជាខ្លឹមសារដល់ការរបស់សាលានោះ គឺហោសៀវភៅសាលានេះ ឯហោសៀវភៅនេះបានតាំងបង្កើតឲ្យមានឡើងតាំងពីវេលាដែលកើតសាលាជាដំបូង បានចម្រើនរៀងរាល់ឆ្នាំដោយទិញដោយទទួលអំណោយ ឬដោយដូរវត្ថុគ្នាទៅវិញទៅមក ឯសៀវភៅទាំងឡាយដែលចេញបោះពុម្ពដោយចំណាយប្រាក់សាលា ឬដោយជំនួយប្រាក់របស់កងការនោះ ត្រូវផ្ញើជា ២ ក្បាលទៅទុកនៅហោសៀវភៅរបស់សាលា ។

គេបានជម្រូវឲ្យរៀបចំសៀវភៅទុកដោយពួកជួបមានខាងក្រោយ ៖ សៀវភៅទាំងឡាយដែលបោះពុម្ព ឬដែលសរសេរចារិកដោយដៃ ជារបស់ប្រទេសឥណ្ឌូស៊ីនបារាំងសេស ២ ប្រការ ទាំងឡាយដែលមាន

ប្រយោជន៍ដល់នានាប្រទេស ក្នុងចុងទិសបូព៌ា សេចក្ដីជំរាបនេះសព្វថ្ងៃនេះបានធ្វើតាមជាច្រើនហើយ ដូចមានរបៀបរៀបរៀងខាងក្រោយនេះជាគាន់ស្រាប់ ។

## ឯហោរាសៀវភៅនោះ មានចែកជា ៧ ប៉ែក

១- របស់ប្រទេសអឺរ៉ុប ។

២- របស់ចិន ។

៣ របស់យួន ។

៤- របស់ជប៉ុន ។

៥- ផែនទី ។

៦- ចារឹក.-- ឯចារឹកទាំងឡាយនេះ មានគ្រប់ភាសា លើកតែចារឹកចិន, យួន និងជប៉ុនចេញ ដែលបានបញ្ចូលគ្នាទៅក្នុងសៀវភៅផ្សេង ៗ ដែលជារបស់ពួកទាំងនេះ ក្នុង ១ ប៉ែក ៗ នោះ មានលំដាប់ ដូចមានខាងក្រោយ ។

ចារឹក ខ្មែរ { ស្លឹករឹត ២៦១ ក្បាល ។
ចារឹក ខ្មែរ { ក្រដាស ៦៨ —

— លាវ ។

— សៀម ។

— ថៃ ។

ចារឹក ចាម ។

- ភូមា ។
- មន ។
- ឡូឡូ ។
- ប៉ាត្តាក ។

មានសារបានចារឹកខ្មែរ ១ បោះពុម្ពផ្សាយក្នុងប៊ុល្លេតាំងពីឆ្នាំ ១៩០២ ទំព័រ ៣៨៧ ឯគម្ពីរសាស្ត្រាលាវនោះមោនសៀរ ល ហ្វីណូត៍ បានរៀន បានរៀបជាមាតិកាក្នុងសៀវភៅ ដែលរៈរកអក្ខរវិធីលាវ ក្នុងប៊ុល្លេតាំងទី ១៧ លេខ ៥ ទំព័រ ១៧៥ បញ្ជីធំសម្រាប់ចារឹកលាវ ។

ដោយសាលាមានចារឹកលាវជា ២ ក្បាល គ្រប់មុខទាំងអស់នោះក៏ បានធ្វើអំណោយ ១ មុខ ១ ក្បាលដល់ក្រុមប៉ូលហ៊ិនកស៊ីអាទិក ។

ម្យ៉ាងទៀតសាលាបានទទួលថែរក្សាសំណៅលិខិតផ្សេង ៗ នៅ ក្នុងគិញលឿកចាស់បុរស្តេចវង់នៅស្រុកតុងកឹង ដែលគេលប់លើកមិន ឲ្យមានស្តេចតាំងពីឆ្នាំ ១៨៩៧ ។

៧ ពុម្ពផ្ដិត. ពង្សាវតារប្រទេសឥណ្ឌូស៊ីននោះ មានជាប់ជាច្រើន នៅលើសិលាចារឹកផ្សេង ៗ ហើយចារឹកទាំងឡាយនេះ នឹងធ្វើឲ្យបានគ ថ្មីឡើងវិញ លុះតែឲ្យផ្ដិតពុម្ពឲ្យបានជាប់ស្នាមអក្សរដែលឆ្លាក់នៅលើថ្ម នោះ ។

## ឯក្ដិតនោះនឹងធ្វើជា ២ បែបបាន

១- បែប ឡ្តុតាំងឡារ៉ែ.–គេដាក់ក្រដាស ១ សន្លឹកទៅលើផ្ទៃថ្ម ទទឹក ហើយគេវាយថ្នមដៃបន្តិចៗ នឹងច្រាស់ ១ រំង ដើម្បីឲ្យបានក្រដាស ផតចូលទៅក្នុងស្នាមអក្សរដែលឆ្លាក់គេទុកក្រដាសនោះនៅលើថ្ម លុះដល់ ស្ងួតទើបទាញយកមក ហើយក៏ឃើញស្នាមអក្សរលេចឡើង ប៉ុន្តែជា អក្សរច្រាស់ដើមទាំងអស់ដូចជាអក្សរដែលឆ្លាក់នៅលើត្រា ។

២- បែបចិន.- គេដាក់ក្រដាសតាមលំអាន ដូចពោលខាងលើនេះ ដែរ ហើយគេធ្វើក្រដាស ឲ្យស្រុតចូលទៅក្នុងស្នាមអក្សរ ដោយយក អន្ទូងក្បាលស្វាវាយពីលើសំពត់សាក្លាតយ៉ាងក្រាស់ លុះកាលណាក្រដាស នោះស្ងួតទៅ គេតាំងយកទឹកខ្មៅទៅជូតពីលើ ហើយអក្សរក៏លេចឡើង ជាសនៅក្នុងផ្ទៃខ្មៅ ។



## អំពីសារមន្ទីរ

ប្រកាសដែលតាំងបង្កើតសាលាបារាំងសេសនោះ បានតម្រូវដល់ ចាងហ្វាងសាលាឲ្យបង្កើតសារមន្ទីរ ១ ហើយសារមន្ទីរនោះ ទំងសាង តែ ១ សម្រាប់ស្រុកទាំងអស់ក៏បាន ទីងសាងក្នុងស្រុក ១ មន្ទីរ ១ ក៏បាន តែក្នុងវេលានោះបានសាងមន្ទីរតែ ១ សម្រាប់ប្រទេសឥណ្ឌូស៊ីន នៅ

ក្រុងព្រៃនគរ មានតាំងមន្ទីរ ១ នៅក្រុងដដែលមុនមន្ទីរនេះ តែមិនបានចម្រើន ហើយក៏លុបលើងលែងឲ្យមានវិញទៅ មន្ទីរនេះបានតាំងនៅលើកន្លែង ១ ជាគេហស្ថានដ៏ឧត្តម ដែលសាងសម្រាប់ធ្វើជាមន្ទីរហើយក៏រើចេញវិញអស់ទៅដោយរួសរាន់ យកកន្លែងនោះទុកសម្រាប់ជាលំនៅលោកលីយ៉ុតីណង់ គូវែរណ័រ ស្រុកកូសាំងស៊ីន ដែលបំពេញមុខក្រសួងជារេស៊ីដ្ដវិញ មានចំណែកខ្លះដែលសល់នៅនោះ យកទៅតម្កល់ទុកក្នុងសួនសម្រាប់ក្រុងខ្លះ ក្នុងសួននៃទីពជគារ គូវែរណ័រម៉ង់ ហើយណេក៏លខ្លះ ចំណែកតាំងនេះសុទ្ធតែ ជាក្បាច់នឹងសិលាចារឹកខ្មែរ លោកចាន់ហ្វាន់សាលា បានយកចំណែកតាំងនេះ ទៅផ្ដុំជាមួយនឹងរូបធ្វើពីថ្ម ដែលយកពីស្រុកខ្មែរទៅកាលពីឆ្នាំ ១៨៩៩ មួយអន្លើនឹងដុំថ្មតាមដែលបានមកពីប្រាសាទបុរាណ ដែលបាក់បែកនៅស្រុកម៉ីសឺន ថ្មតាំង-ឡាយនេះ បានជាគ្រាប់ពូជសម្រាប់មន្ទីរនេះ ដែលបានតាំងនៅលើដីជាមួយនឹងសាលានៅផ្លូវប៉ែឡឺរង់ កាលពីឆ្នាំ ១៩០១ គេបានបន្ថែមពួករបស់ដែលធ្វើពីដីស, ពីថ្មនល, ពីទក្កនិងសម្រិទ្ធ ដែលម៉ោនសៀរប៉ើ-លីយ៉ូ បានប្រមូល នៅវេលាដែលគេតាំងជាមិស្សង ទៅក្នុងស្រុកចិនព្រមទាំងវត្ថុផ្សេង ៗ ឯទៀត ដែលមានចារឹកនៅនោះ ។

លុះដល់មកក្នុងឆ្នាំ ១៩០២ គេលែងឲ្យនាំចូលទៅក្នុងស្រុកតុងកឹងក្បាច់អលង្ការទាំងប៉ុន្មាន ដែលមិនមែនជាវត្ថុសម្រាប់ សេចក្ដីស៊ីវិល័យ

របស់ប្រទេសឥណ្ឌូស៊ីន ហើយគេក៏បញ្ចូលទៅជាមួយ ទឹងតាក់តាម
របស់ចិនតាំងឡាយ មួយអន្ទើទីងវត្តដែលមានតាក់នៅនោះ ហើយ
ដែលប្រែផ្លាស់កន្លែងទៅនាំឲ្យវិបលាស ឯមន្ទីរដែលតាំងនៅលើដីរបស់
សាលានោះ ក៏បានរុះរើចេញពីកន្លែងនេះកាលពីឆ្នាំ ១៩០៤ ដោយផុត
កំណត់សន្យា ។

ខគារខ្មែរ ក៏បានទទួលទូរក្សាប់អសក្តារខ្មែរក្នុងនគរ គឺមានការកេ
១ ច្បាប់ចុះថ្ងៃ ១៧ អ៊ូត ឆ្នាំ ១៩០៥ តាំងបង្កើតជាប៉ែកខាងរបស់បុរាណ
ខ្មែរនៃមន្ទីរតាំងសម្រាប់ប្រទេសឥណ្ឌូស៊ិន នៅក្នុងសេចក្តីត្រួតត្រានៃ
លោកឡឺសេ៊ុផ្គ ស៊ុបើរីយ៉ើរនិងក្រុមត្រួតត្រាតាមវិទ្យាសាស្ត្រក្នុងសាលា
បាំពងសែសនៅចុងបូព៌ាប្រទេស ប៉ែកនេះកាលដើមឡើយ បានតាំងនៅ
ក្នុងវត្តព្រះកែវ ក្រោយមកទើបព្រះចៅក្រុងកម្ពុជាទ្រង់ព្រះតម្រិះថាទីង
សាងជាមន្ទីរ ១ ក្នុងព្រះបរមរាជវាំងចាស់ ដែលប្រថាប់មុនគ្រងរាជ្យដោយ
ចេញព្រះរាជទ្រព្យដើម្បីដាក់របស់តាំងនេះ របស់តាំងនេះមានសៀវ៉ាវ-
មង់បេបានរៀបចំដោយពួកដោយកង ហើយបានរោងជាសៀវភៅការ-
តាឡុក លុះដល់មកក្នុងឆ្នាំ ១៩១៩ បានយកមកតម្កល់ទុកក្នុងមន្ទីរក្រុង
កម្ពុជា ដែលសព្វថ្ងៃនេះហៅថា មន្ទីរអាល់បែរសារ៉ូត៍ នៅក្នុងសេចក្តី
ត្រួតត្រានៃក្រុមត្រួតត្រាតាមវិទ្យាសាស្ត្រ ជាដរាប ។

ឯរបស់បុរាណខ្មែរតាំងប៉ុន្មាននោះ ចាត់ការដោយស្រួលបួលហើយ

ឯក្បាច់ចេនាចាមនោះ មិនទាន់បានចាត់ចែងឲ្យស្រួលនៅឡើយ ដោយគ្មានស្តេចតាមទីងចាត់ការកសាងមន្ទីរ សម្រាប់តម្កល់របស់ទាំងនេះ កាលដើមបានតម្កល់ទុកក្នុងកន្លែង ក្រុមតម្រួតនៅក្រុងព្រៃនគរ រួចពីនោះ ក៏បានយកទៅតម្កល់ ក្នុងកន្លែង ប៉ូលហ៊ិន សម្រាប់វិះកវិជ្ជាក្នុងប្រទេសឥណ្ឌូស៊ីន ក្នុងវេលានោះ គេបានបង្កើតកន្លែងតម្កល់ជាច្រើន ដើម្បីឲ្យបានសាងមន្ទីរចាម ១ នៅស្រុកទួរ៉ាន លុះ ១៥ ឆ្នាំក្រោយមក ក៏បានសម្រេចតាមគំនិត ប្រកាសអារេត ១ ច្បាប់ចុះថ្ងៃ ២២ យូកំងឆ្នាំ ១៩១៨ បានបង្កើតប៉ែកខាងរបស់បុរាណចាម នៃមន្ទីរតាំងសម្រាប់ប្រទេសឥណ្ឌូស៊ីន ១ នៅក្នុងសេចក្តីត្រួតត្រានៃលោក គូវែរណើរ យេរណេរ៉ាល់ នឹងក្រុមត្រួតត្រាតាមវិទ្យាសាស្ត្រក្នុងសាលាបារាំងសែសជាន់ខ្ពស់នៅចុងបូព៌ាប្រទេស ឯមន្ទីរតូចនេះដែលបានរៀបចំដោយសេចក្តីប្រាថ្នាយ៉ាងពិតតាមសេចក្តីរិះគិត របស់ មោនសៀរ ដឺឡាវ៉ល់ និង មោនសៀរ អូគែរ ជាចាងហ្វាងក្រសួងសង់គេហស្ថាននៅស្រុកអណ្ណាម នោះបានសាងហើយស្រេចក្នុងឆ្នាំ ១៩១៦ ហើយមោនសៀរ ប៉ារមង់ទេ បានរៀបចំក្នុងឆ្នាំ ១៩១៩ បានធ្វើជាកាតាឡុកចំនួន ២៦៨ ទំព័រ ហើយមានទំព័រជាច្រើនដែលមានក្បាច់ចេនាល្អ ៗ ៗ

ឯក្បាច់អលង្ការចាម និង អលង្ការខ្មែរ ដែលមានមន្ទីរមួយ ៗ ផ្សេងពីគ្នានោះ មិនសូវយកទៅតាំង នៅក្រុងហាណូយញឹកញយទេ ដែលយក

ទៅតាំងម្ដងៗនោះ គឺយកតែរបស់ដែលបានរើសផ្ចិតផ្ចង់ ច្រើនតែរបស់ដែលធ្វើពីសម្រិទ្ធ និងរបស់ឯទៀតដែលមានតម្លៃ ឯមន្ទីរនេះបរិបូណ៌ខាងក្បាច់អលង្ការផ្សាយទៅក្នុងស្រុកអណ្ណាម-តុងកឹង, ស្រុកសៀម, ស្រុកកម្ពុជា ទឹងស្រុកនានាឯទៀត ដែលនៅជិតប្រទេសឥណ្ឌូស៊ីន គឺស្រុកឥណ្ឌា, ស្រុកទីបេ, ស្រុកចិន, ស្រុកជប៉ុន, ស្រុកកូរេ មន្ទីរនេះ មានតាំងប្រាក់បុរាណជាច្រើនផង ព្រមទាំងដើមពង្សាវតារដែលមានតួយ៉ាងគំរូនៃរបស់សិប្បីយការ ដែលធ្វើពីថ្ម និងអាយុនៃសំរិទ្ធក្នុងប្រទេសឥណ្ឌូស៊ីន។

## អំពីការផ្សាយ

សាលាបារាំងសេស បានចេញបោះផ្សាយការដែលរិះរកតាំងពីឆ្នាំ ១៩០១ ក្នុងប៊ុល្លីតាំងរបស់សាលាបារាំងសេស នៅចុងបូព៌ាប្រទេស ដែលបោះពុម្ពនៅប្រទេសហាណូយ កាលដើមមានមោនស៊ៀរ ហ្វូ-ហ. ស្នៃដែរ ជាអ្នកបោះហើយតក្រោយមកមានរោងពុម្ពនៅចុងបូព៌ាប្រទេស ក្នុងប៊ុល្លីតាំងទាំងនោះ មានសុទ្ធតែការជាថ្មីដែររបស់ពួកម៉ម និងពួកដែលធ្វើការក្នុងសាលាទាំងអស់ហើយ ឯសេចក្ដីផ្សាយទាំងនេះ ដែលបានបំពេញដោយសៀវភៅដែលរិះរកថ្មី និងសៀវភៅពង្សាវតារផ្សេងៗ នោះ បានឡើងជាមេមួយដ៏ឧត្ដម សម្រាប់ទឹងសិក្សាវិទ្យាសាស្ត្រក្នុងទ្វីបអាស៊ីខាងកើត បើទឹងរៀបរាប់ក្នុងនេះ អំពីរឿងក៏ដែលបានប្រកាសនោះ ឃើញជាវែងឆ្ងាយពន់ពេកណាស់ ដូច្នេះយើងយល់ឃើញថាទឹងធ្វើឲ្យដឹងតែរបស់ណាដែលមានប្រយោជន៍ជាងគេ ។

# ស្រុកឥណ្ឌា

សៀវភៅរឿងក្បាច់អលង្ការក្រិក ក្នុងរឿងព្រះពុទ្ធ នៅស្រុកគន្ធារ សេចក្តីរិះរកដើមកំណើតនៃរឿងក៏រក្នុងពុទ្ធសាសនា ក្នុងស្រុកឥណ្ឌា និង ក្នុងចុងបូព៌ាប្រទេស មានមោនសៀរ អ-ហ្វូសេ ជាអ្នកតែង ខែ ១ ឆ្នាំ ១៩០៥ ខែ ២ ឆ្នាំ ១៩០៨ ។

សៀវភៅមាតិកាបារឹក សាសនាជេន ដែលមានពង្សាវតារពួកជេន ជាខាងដើម ស្រង់យកពីបារឹកផ្សេង ៗ មោនសៀរ អ. គេរីណូ ជាអ្នកតែងពីឆ្នាំ ១៩០៨ ។

សៀវភៅពួកទី ៣ ដែលមានសារបានថា ហោសៀវភៅនៃសាលាបារាំងសែស នៅចុងបូព៌ាប្រទេសនោះ សម្រាប់តែសេចក្តីស្រង់ផ្សេងក្នុងអក្ខរវិធី ឯសៀវភៅទាំងនេះមានផ្សាយ ២ ក្បាល ហើយជារបស់មោនសៀរ វិកទ័រហង់រី ជាគ្រូនៅមហាវិទ្យាល័យ នៅក្រុងប៉ារីស តែង ២ ក្បាល ។

១ គឺវិធីភាសាសំស្ក្រឹត ដែលបានរៀបចំដោយពួក-កង់ ប៉ារីសឆ្នាំ ១៩០២ ។ ២ ក្បួនវេយ្យាករណ៍បាលី ប៉ារីសឆ្នាំ ១៩០២ លុះក្រោយមកសាលាបានផ្សាយក្រៅពីកាត្តាឡុក និងក្បួនណែនាំផ្លូវរបស់សារមន្ទីរ ដូចមានពោលខាងលើនេះ គឺក្បាច់អលង្ការក្នុងប្រទេសឥណ្ឌូស៊ីនដែល មោនសៀរ ឯ លុណេដឺឡាសុងគ្យែរ តែង ប៉ារីសឆ្នាំ ១៩០១ សេចក្តី

ក៏ពរនៃក្រុមប្រឹក្សាតាន់ប្រទេសអំពីសេចក្ដីរិះរក ក្នុងចុងបូព៌ាប្រទេសដំបូង ហាណូយ ឆ្នាំ ១៩០២ ។

កាលពីឆ្នាំ ១៩២១ សាលាបានចាប់ផ្ដើមផ្សាយសៀវភៅថ្មី ១ ពួកទៀត គឺក្បួនចិនដែលនិយាយអំពីស្រុកឥណ្ឌូចិន ឯសៀវភៅវេទាក្នុងស្រុកអាស៊ីដែលមានសៀវភៅគោលបែហ្វ តែងនោះ បានបោះពុម្ពតាំងពីឆ្នាំ ១៩២០ ដោយសេចក្ដីឧបត្ថម្ភនៃសាលាបារាំងសែសនៅចុងបូព៌ាប្រទេស ។

# អំពីប្រាសាទបុរាណ

កិច្ចការដែលមានប្រយោជន៍យ៉ាងធំ ដែលប្រគល់មកឲ្យសាលាបារាំងសែសនោះ គឺការថែទាំប្រាសាទបុរាណ ក្នុងប្រទេសឥណ្ឌូចិន ក៏ដូចជាប្រទេសឯទៀតដែរ មានធ្វើឲ្យអន្តរាយនូវប្រាសាទបុរាណជាច្រើន របស់បុរាណដែលល្អៗ ក៏បាត់បង់អស់ទៅ ដោយគ្មានអ្នកទំនុកបម្រុង មានប្រកាសអារ៉េតេ ១ ច្បាប់ ចុះថ្ងៃ ៩ ម៉ារ្ស ឆ្នាំ ១៩០០ ឲ្យអំណាចដល់សាលា ឲ្យហាមឃាត់មិនឲ្យធ្វើអន្តរាយតទៅទៀត ។

ក្នុងអារ៉េតេនោះមានសេចក្ដីថាឯអចលន ឬ ចលនវត្ថុទាំងប៉ុន្មានដែលមានរៀបរាប់ក្នុងសេចក្ដីក៏ពររបស់លោកចាងហ្វាងសាលាបារាំងសែស នៅចុងបូព៌ាប្រទេសនោះ នឹងជារ នឹងបំផ្លាញ ឬ នឹងកែប្រែក្នុងសណ្ឋានដូចម្ដេច ឥតមានអនុញ្ញាតពីលោក គូវែរណើរយេណេរ៉ាល មិនបានឡើយ ហាម

ផ្តាច់មិនឲ្យនាំវត្ថុទាំងនេះ ប្រាសចាកទីកន្លែងរបស់បុរាណទាំងឡាយដែល រកឃើញដោយកាប់គាស់កកាយ ឬ ដោយធ្វើការងារផ្សេងៗ នោះត្រូវ ជូនដំណឹងដល់លោកគូវែរណើរយេណេរ៉ាល ដើម្បីលោកនឹងចាត់ការឲ្យ ធ្វើដូចម្ដេចៗ លោកចាងហ្វាងសាលាបារាំងសែសមានកិច្ចធុរៈត្រូវត្រួតត្រា ប្រាសាទបុរាណ ត្រូវតម្រូវសេចក្ដីជូនលោក គូវែរណើរយេណេរ៉ាល អំពីបែបយ៉ាងដែលត្រូវថែរក្សាប្រាសាទទាំងនេះ ៗ

មានប្រកាសអាររេតេជាច្រើនច្បាប់ ដែលចាត់ការរៀបចំដើម្បីថែ រក្សាប្រាសាទបុរាណទាំងឡាយ ដែលមាននៅក្នុងស្រុកផ្សេងៗ ក្នុងដែន ឥណ្ឌូស៊ីនបារាំងសែស ប្រកាសអាររេតេចុះថ្ងៃ ៦ អាព្រិល ឆ្នាំ ១៩០១ ថ្ងៃ ១៥ អាព្រិល ឆ្នាំ ១៩០៥ ថ្ងៃ ២៤ ណូវែម ឆ្នាំ ១៩០៦ ថ្ងៃ ១៨ មេ ឆ្នាំ ១៩០៨ ចំនួនប្រាសាទ ឬ ពួកប្រាសាទ ដែលបានរៀបជាមាតិកានោះ មានចំនួនដូចមានខាងក្រោយ ៖

| | |
|---|---|
| ចំប៉ា . . . . . | ៦០ ៗ |
| ក្រុងកម្ពុជា និង កូសាំងស៊ីន . . | ២២០ ៗ |
| ស្រុកលាវ . . . . | ២៥ ៗ |
| ស្រុកតុងកឹង ហាណូយ . . . | ៧ ៗ |

មានបញ្ជីថ្មី ១ ទៀតទើបនឹងរៀបចំធ្វើ បញ្ជីនោះមានបន្ថែមប្រា-សាទនៅតុងកឹងទៀត ដែលមិនទាន់បានរៀបជាមាតិកានៅឡើយ មួយ អន្ទើនឹងប្រាសាទផ្សេងៗ ដែលមាននៅក្នុងខេត្តទាំងប៉ុន្មាន ដែលនគរ

សៀមសងមកវិញកាលក្នុងឆ្នាំ ១៩០៧ គឺសៀមរាប ស៊ីសុផុន និង បាត់-
ដំបង ដែលមានប្រកាសអារក្សចុះថ្ងៃ ១៨ មេ៉ ឆ្នាំ ១៩០៨ មានរៀបទុក
ទាំងដុំ ។

ឯប្រាសាទ ២ នៅស្រុកកណ្ដាល ដែលក្រសួងក្បាច់អលង្ការក្នុង
សាលាបានជួសជុលជាថ្មីនោះ គឺ ប្រាសាទពោធិ៍គរនៅស្រុកញ៉ាត្រាំង
១ (១៩០៦-១៩០៩) និងប្រាសាទពោធិ៍ក្រោងការនៅស្រុកផាំងពង ១
(១៩០៨) នៅស្រុក គុងពីង សាលាបានជួយជួសជុលដល់រាជការ
ប្រាសាទ រ៉ាំង មៀវ នៅក្រុងហាណូយ (១៩១៨-១៩២០) ប៉ុន្ដែដែល
សាលាខិតខំដោយអស់ពីចិត្តនោះ គឺប្រាសាទបុរាណនៅអង្គរ ។

សេចក្ដីដែលយកប្រជុំប្រាសាទបុរាណដ៏ឧត្ដម ឥតមានប្រាសាទឯ
ណាស្មើមកវិញ ដោយមានសញ្ញាត្រេតក្រុងបារាំងសែសនិងក្រុងសៀម
ចុះថ្ងៃ ២៣ មារ៉្ស ឆ្នាំ ១៩០៧ ប្រគល់មកឲ្យរាជការបារាំងសែសនោះ នាំឲ្យ
មានសេចក្ដីខុសត្រូវក្នុងការថែរក្សាប្រាសាទទាំងនេះរាជការគួរវែរណឺម៉ង់
យេរណេរ៉ាលក្នុងស្រុកឥណ្ឌូស៊ិន ក៏បានចាត់ការនេះឥតរួញរា ហើយ
តម្រូវឲ្យសាលាបារាំងសែសកាន់កាប់ការនេះត្រួតត្រាជានុរ៉ាល និងដោយ
ចាត់អ្នករាជការ ១ ក្រុមដែលស្ទាត់ខាងវិជ្ជារចនា ឯកិច្ចការដែលធ្វើនោះ
ក្រសួងក្បាច់អលង្ការក្នុងសាលាបានចាត់ការរៀបចំ ហើយដើម្បីនឹង
សម្រេចការទាំងនេះ បានសង់ជាប៉ុស្ដិ៍ ១ ហៅថា មន្ទីរកាន់កាប់ប្រជុំ
អង្គរ ដែលមានអ្នកកាន់កាប់ជាដំបូងឈ្មោះ សង់ កុម្មែ អ្នករាជការនេះ

បានយកចិត្តទុកដាក់ធ្វើពដការដោយស្មោះត្រង់ កំណត់ ៩ ឆ្នាំដោយសេចក្តី ឧហាតនិងដោយតម្រិះប្រាជ្ញាធ្វើឲ្យប្រាសាទធំ ៗ ដែលកប់បាត់ទៅក្នុង ព្រៃស្បាតនោះ លេចឡើយកណ្តាលវាលបាន គឺជាដំបូងបានចាត់ការ នៅប្រាសាទអង្គរវត្តរួចពីនោះប្រាសាទបាយ័ន ហើយខាងក្រោយបំផុត ប្រាសាទបាពួន លុះដល់មកក្នុងឆ្នាំ ១៩១៦ សេចក្តីមរណៈមកផ្តាច់កាត់ ពីការដែលកំពុងធ្វើទៅ ទើបមោនស្យេរ ហង់រីម៉ាស៊ែល ចាត់ធ្វើការ តទៅទៀត អ្នកពដការខាងក្រោយនេះ បានចាត់ការក្តាព្រៃនៅភិមាន អាកាស ព្រះបាលីឡៃ, ព្រះពិធូ និងទីព្រះលានធំៗ លុះដល់ពេលគាត់ ឈប់សម្រាកកម្លាំងនោះ មោនស្យេរ សាលិប័ត្តើរបានចាប់ធ្វើការតទៅ ទៀតក្នុងឆ្នាំ ១៩២០-១៩២១ គឺចាប់ក្តាប្រាសាទតាព្រហ្ម ១ តាកែវ ១ និងបន្ទាយក្តី ១ ព្រមទាំងរៀបចំផ្លូវយក្សនៅទ្វារជ័យផង ការទាំងឡាយ នេះបានចាត់ចែងដោយយកប្រាក់ ក្នុងបញ្ជីចំណូលចំណាយ សម្រាប់ សាលាបាកំងសែស និងប្រាក់ជំនួយពីពដការប្រូតិកតូចផង ការពិនិត្យ រិះរកប្រាសាទបុរាណនោះ បានចំរើនឡើងជាគួរនឹងការថែទាំប្រាសាទ ទាំងនេះ ការទាំងនេះចំពោះតែទៅលើប្រាសាទបុរាណក្នុងស្រុកចម្ប៉ា និងក្នុងស្រុកខ្មែរជាដើម ឯក្បាច់អក្សរខ្មែរនោះ គេបានស្គាល់ដោយ ការដែលបានធ្វើពីដើម និងហោយសៀវភៅផ្សេង ៗ នៅក្នុងសារមន្ទីរ ត្រូកាដេរូ និង មន្ទីរគីម៉េ ឯស្រុកចម្ប៉ាវិញនោះក៏បាត់ស្ងាត់សូន្យ គ្មាន នរណាប្រកដអំពីទេសរបស់នេះសោះ មានតែអ្នកប្រាជ្ញទើបនឹងនាំគេ

នេះ ពីត្រើយសមុទ្រស្រុកអណ្ដាម ទៅទុកនៅខាងត្បូងស្រុកខ្មែរបានក្បាច់ រចនាតាមសព្វថ្ងៃនេះ ក៏មនុស្សស្គាល់តិចណាស់ ហើយកាលវេលា ដែលសាលាគំពុងរិះរកឲ្យភ្លឺច្បាស់ឡើងនោះ ក៏គ្មានអ្នកឯណាមួយដឹង សោះ ការដែលរកឃើញឡើងវិញនោះ មានចំនួនជាច្រើនដែរ ដែល ជាថ្វីដៃរបស់ លោកសៀរ ហង់រីប៉ារមង់ទេ កាលក្នុងឆ្នាំ ១៩០២ សេចក្ដី ដែលលោកតែងអំពីប្រាសាទពោនគរនៅស្រុកញ៉ាត្រាំងនោះ នាំឲ្យលោក បានមេដៃទី ៣ ក្នុងវេលាដែលប្រឡងរបស់ក្រោយមកទៀត គឺក្នុងឆ្នាំ ១៩០២ លោកបានរិះរកជាមួយនឹង លោកសាលិការប៉ូ ព្រះវិហារ បុរាណដែលបាក់បែក ឈ្មោះ លក្ខិន្ទ្រលោកេស្វរ នៅស្រុកដុងឌឿង ( ក្វាងណាំ ) រួចពីនោះ បានរិះរកក្នុងខេត្តជាមួយនេះទៀត កន្លែងប្រជុំ ប្រាសាទបុរាណ ដែលបាក់បែកទៅក្នុងតំបន់មីសឺន (១៩០៣-១៩០៤) ហើយខាងក្រោយមកទៀត បានរុករករកប្រាសាទបុរាណ នៅស្រុក ចាន់ឡូ ( ក្វាងង៉ាយ ) ឆ្នាំ ១៩០៤ មានការជាច្រើន ដែលរៀបចំសារ-បាន នៃប្រាសាទបុរាណចាមនៅស្រុក អណ្ដាម ហើយដែលមាន រៀបរាប់អំពីប្រាសាទទាំងប៉ុន្មាន ដែលជាការរចនាបែបឥណ្ឌូនិងប្រទេស ឥណ្ឌូស៊ីន ។

នៅក្នុងក្រុងកម្ពុជា លោកសៀរ ស.កុំស្មៃ បានបាត់ការរុករកក្នុង ស្រុកបាសាក់ (ខេត្តរំដួល) លោកសៀរ ហ.ឌុបហ្វូរ និង ស.កាប៉ូ ទាំង ២ នាក់ បានគាស់កកាយកំផែងពីរ នៅប្រាសាទបាយ័ន ហើយបាន

ថតយកក្បាច់នៅផ្ទាំងតាំងអស់ ក្នុងឆ្នាំ ១៩០១, ១៩០២, ១៩០៤, មេនសៀរ ហ បារមង់ទេ បានអធិប្បាយ អំពីប្រាសាទនៅវត្តនគរ កំពង់ចាម និងវត្តភូ នៅបាសាក់ ។

បើនឹងរៀបរាប់ឲ្យគ្រប់ តែការដែលរិះរកខាងក្បាច់ចេនាក្នុងស្រុកចម្ប៉ា និងក្នុងស្រុកខ្មែរទៅ ឃើញជាវែងឆ្ងាយពន់ពេកណាស់ សេចក្ដីដែលគេឃើញ ដោយការតាំងឡាយនេះ មានបារឹកដែលគេឃើញថ្មី ៗ ជាដើមនោះ ឃើញថាបានការជាច្រើនណាស់ទៅហើយ អំពីពង្សាវតារ និងក្បាច់អលង្ការរបស់នគរទាំង ២ នេះ ប៉ុន្តែក្នុងកន្លែងទាំង ២ នេះ នៅមានការដែលធ្វើ ច្រើនណាស់ទៀត ហើយការដែលរុករកនោះ ជាកិច្ចដើមបំផុតរបស់សាលា ។

## អំពីដំណើរនឹងបាត់ពួកមិស្យុង

ការរបស់សាលានេះ បានចម្រើនជាច្រើន អំពីរបស់ដែលគេឃើញក្នុងវេលាដែលពួកម៉មក្នុងសាលាចេញដំណើរទៅពិនិត្យរិះរក ដូនកាលក្នុងប្រទេសឥណ្ឌូស៊ីន ដូនកាលក្នុងស្រុកនានា ឯទៀត ក្នុងបុងបូពាប្រទេស ។



# ការរិះរកហើយផ្សាយដែលស្រង់យកតែការណា
# ដែលមានប្រយោជន៍ដល់ក្រុងកម្ពុជា
# ស្រុកខ្មែរ

ឆ្នាំ ១៨៩៩ ល.ហ្វីណូត៍ និង អ.បាគុង..សេចក្ដីរិះរកអំពីភាសា ក្បាច់រចនា និង សេចក្ដីចេះដឹង អំពីតាំងប្រជុំគម្ពីរខ្មែរជាដំបូង ។

ឆ្នាំ ១៩០០ ល.ដឺឡាសុងគ្យែរ អំពីមាតិកានៃប្រាសាទ ហៅសៀវ-ភៅ ផែនទីក្បាច់អលង្ការក្នុងស្រុកឥណ្ឌូស៊ីន ប៉ារីស ឆ្នាំ ១៩០១ សន្ទឹក ស្រុកខ្មែរ មាតិកានៃប្រាសាទ ក្នុងស្រុកខ្មែរ ខ្សែ ១ ប៉ារីស ឆ្នាំ ១៩០២ ។

ឆ្នាំ ១៩០១ ហ.ឌុហ្វួរ និងស.ការប៉ូ អំពីគាស់កកាយកំផែងប្រាសាទបាយ័ន ជាន់ទី ២ ផែនទី និង រូបថតក្បាច់នៅជញ្ជាំង ដេសម ឆ្នាំ ១៩០១ យ៉ាំរីយេរ ឆ្នាំ ១៩០២ ។

ឆ្នាំ ១៩០២ ស.កុម៉្មែ អំពីរុករកក្នុងស្រុកបាសាក់ ក្នុងខែត្ររំដួល ( ប៊ុល្លីតាំង លេខ ២ ទំព័រ ៦០ ) ។

ឆ្នាំ ១៩០៤ ហ.ឌុហ្វួរ និង ស.ការប៉ូ អំពីមីស្យុងលើកទី ២ ទៅពិនិត្យប្រាសាទបាយ័ន អំពីកាប់ឆ្កា និង ថតក្បាច់នៅកំផែងជាន់ទី ១ អំពីផែនទីបាយ័នតាំងមូល ( ម៉ារ្យ ) ថែមការរបស់លោក ការប៉ូ ពីថ្ងៃ ២៨ យូកាំង ឆ្នាំ ១៩០៤ ទៀត អំពីរឿងរ៉ាវប្រាសាទបាយ័ននោះនគរធំ ឯគំនូរ

ធ្លាក់នៅជញ្ជាំងនោះ បានចេញផ្សាយដោយសេចក្ដីត្រួតត្រាពិនិត្យ នៃក្រុមកុំមិស្យុង ក្បាច់អលង្ការ ក្នុងប្រទេសឥណ្ឌូស៊ិន តាមកិច្ចការដែលលោកហង់រីឌុហ្វូរ បានចម្លងមក ជាមួយនឹងលោក ការប៉ូ ប៉ារីស ឆ្នាំ ១៩១០-១៩១៣ ២ ក្បាល មានសេចក្ដីអធិប្បាយដោយសង្ខេប អំពីក្បាច់អលង្ការ ដែលលោក កុម្ម៉ូ និងសឺដេស តែង នៅជាខាងដើម ។

ឆ្នាំ ១៩០៤-១៩០៥ ល.ដឺឡាសុងគៀរ អំពីមិស្យុងស្រុកខ្មែរនិងស្រុកសៀម ទំនាបទន្លេមេណាម ទំនាបទន្លេមូន ខែត្រម្លូព្រៃ ថាឡាបរ៉ាក់ ស្ទឹងត្រែង សេចក្ដីអធិប្បាយក្នុងប៊ុល្លីតាំងលេខ ៥ ទំព័រ ២៤២ សារបុរាណមាតិកានៃប្រាសាទក្នុងស្រុកខ្មែរខ្សែ ២ ប៉ារីស ឆ្នាំ ១៩០៧ ។

ឆ្នាំ ១៩០៧-១៩០៨ ល.ដឺឡាសុងគៀរ អំពីមិស្យុងទៅអង្គរ និងក្នុងខែត្រដែលសៀមប្រគល់ឲ្យមកវិញ ជាមួយនឹងល្យូតឺណង់ ប៊ុអាត និងឌុក្រេ ដើម្បីគូរផែនទីអង្គរ សេចក្ដីអធិប្បាយក្នុងប៊ុលីតាំងលេខ ៧ ទំព័រ ៤១៩ លេខ ៨ ទំព័រ ២៩២ លេខ ៩ ទំព័រ ៣៥១ ប៊ុល្លីតាំង ក្រុមជំនុំក្បាច់អលង្ការ ឆ្នាំ ១៩០៩ ទំព័រ ១៦២ សារបុរាណមាតិកា នៃប្រាសាទនៅស្រុកខ្មែរខ្សែ ៣ ( មានជាប់ផែនទីក្បាច់បេនាស្រុកខ្មែរ ខ្នាតលេខ $\frac{១}{៧៥០.០០០}$ ផង និងផែនទី ២ ខ្នាត $\frac{១}{៥០.០០០}$ និង $\frac{១}{២៥.០០០}$ ទៀត អំពីប្រជុំអង្គរដែល ល្យូតឺណង់ ប៊ុអាត និង ឌុក្រេ គូរ....ហាណូយ ឆ្នាំ ១៩០៩ ។

ឆ្នាំ ១៩០៨ ស.កុម៉្មៃ ចាប់ផ្ដើមធ្វើការនៅអង្គរ លុះដល់មរណភាពនៅថ្ងៃ ២៩ អាវ្រិល ឆ្នាំ១៩១៦ ។

ឆ្នាំ ១៩១១ ហ. ប៉ារមង់ចេ អំពីអង្គរ បេងមាលា ក្នុងដែនកំពង់ធំ សំបូរព្រៃគុក (ពិនិត្យកំណត់ ១ ខែ) សំពេងសែន កំពង់ឆ្នាំង ពោធិសាត់, កំពង់ចាម, តាកែវ, អង្គរបុរី, មាតិកានៃមន្ទីរតាំងនៅក្រុងភ្នំពេញ សេចក្ដីអធិប្បាយក្នុងប៊ុល្លីតាំងលេខ ១១ ទំព័រ ២៤៥ កាត្ដាឡុករបស់មន្ទីរតាំងរបស់ខ្មែរនៅក្រុងភ្នំពេញ ប៊ុល្លីតាំងលេខ ១២ ទី ៣ សេចក្ដីបំពេញមាតិកាប្រាសាទ ក្នុងស្រុកខ្មែរ ប៊ុល្លីតាំងលេខ ៣ ទី ១ ។

ឆ្នាំ ១៩១២ ស.ដឺមិក្កឺណឹម បានចាប់ធ្វើការនៅអង្គរ វេលាដែលលោក កុម៉្មៃ ឈប់សម្រាកកម្លាំង ហើយបានពិនិត្យ បេងមាលា អំពីគេហដ្ឋានដែលជាប់នឹង បេងមាលា ប៊ុល្លីតាំងលេខ ១៣ ទី ២ ។

ឆ្នាំ ១៩១២-១៩១៣ សឺដេស សេចក្ដីអធិប្បាយក្នុងប៊ុល្លីតាំងលេខ ១២ ទំព័រ ១៧៦ លេខ ១៣ ទំព័រ ១១៤ ។

ឆ្នាំ ១៩១៤ ស.ដឺម៉ាស៊ីរ អង្គរ កោះកេ (ក្នុងខេត្រព្រំទេព) ភ្នំដី (ក្នុងខេត្រសៀមរាប) មរណភាពដោយគេសម្លាប់នៅស្រុកសេឌុលបាប្រហ (ដារដោណែល) ពីថ្ងៃ ១ ម៉េ ឆ្នាំ១៩១៤ ។

ឆ្នាំ ១៩១៦ ហ.ម៉ារស័ល បានចាប់ធ្វើការជាថ្មីនៅអង្គរ ដែលគាត់ទានមួយគ្រា ដោយមរណភាពនៃលោក ស.កុម៉្មៃ លោក ល.ហ្វីណូត៍ និង ហ.ប៉ាមង់ចេ បានចាប់ធ្វើការនៅអង្គរ កំពង់ធំ សំបូរព្រៃគុក លោក

ប៉ារម៉ង់ទេ បានបញ្ចប់សេចក្តីរះរកកន្លែងវត្តនគរ នៅកំពង់ចាម ហើយយកមកតម្កល់ទុក នៅមន្ទីរតាំងរបស់នៅក្រុងភ្នំពេញ លោក ហ ប៉ារម៉ង់ទេ អធិប្បាយពីវត្ត នគរ ក្នុងប៊ុលីតាំងលេខ ៦ ទី ៤ ។

ឆ្នាំ ១៩២០-១៩២១ ល.ហ្វីណូត៌ ហ.ប៉ារម៉ង់ទេ និង វ.គោលូបេហ្វ អំពីអគ្គិរបន្ទាយឆ្មារ បាត់ដំបង-មោនសៀរស.ប៉ារ្តើរ ចាប់ធ្វើការនៅអង្គរ វេលាដែលមោនសៀរ ហ.ម៉ារស៊័ល ឈប់សម្រាកកម្លាំង ។

## ក្រសួងបិតរូប

ឯរូបថតតាំងប៉ុន្មាន ដែលពួកមិស្សន៍បានថតនោះ បានប្រមូលផ្តុំទុកដោយពួក ដូចមានចំនួនខាងក្រោយនេះ

| | | | |
|---|---|---|---|
| រូបទំហំ | ១៨ × ៦៤ | នោះមានចំនួន | ១៦០០ |
| – | ១៣ × ១៨ | – | ១៥០០ |
| – | ៩ × ១២ | – | ៧៦៤ |
| – | ៦ × ១៣ (ផ្ទុយ) | – | ១៣៣ |
| – | ៦ × ១៣(ធម្មតា) | – | ២០៥ |
| កញ្ចក់ឆ្នោះផ្ទុយ | | – | ១៨១ |
| កញ្ចក់ឆ្នោះធម្មតា | | – | ៩០ |
| កែវសម្រាប់បញ្ចាំងពន្លឺ | | – | ៨៥០ |

ម្យ៉ាងវិញទៀតសាលាមានតាំងរូបថត ដែលលោក ធុំសុន ថតតាំង

ពីឆ្នាំ ១៨៦៦ នៅអង្គរវត្ត បានតាំងអ្នកថតជាតិយួនម្នាក់សម្រាប់ការនេះ ។

## អំពីការសិក្សា

សាលាបារាំងសែស មិនមែនជាសាលាសម្រាប់បង្ហាត់បង្រៀន ដូចសាលាតាំងពួងធម្មតានោះទេ គឺគ្រាន់តែបង្ហាត់បង្រៀនក្នុងពួកក្រុមសាលានេះ វិធីតាំងឡាយដែលទៅរករៀននៅទីឯទៀតមិនបាន ហើយនិងចូលជួយបង្រៀនក្នុងសាលារាជការ ក្នុងប្រទេសឥណ្ឌូស៊ិន ដូច្នេះហើយបានជាអក្សរចិននោះ ត្រូវមានសៀវ ប៉េលីយ៉ូ និង មានសៀវហ៊ុបែរ បង្រៀនម្តងម្នាក់អក្សរក្វានហួ ត្រូវមានសៀវ ម៉ៃបុង អក្សរជប៉ុនត្រូវមានសៀវ ប៉េរី អក្សរសំស្ក្រឹត និង អក្សរទីបេត្រូវមានសៀវគ័រឌីយេនៅ វេលាដែលតាំងប្រជុំសាលាក្នុងប្រទេសឥណ្ឌូស៊ិន (ឆ្នាំ ១៩០៧-១៩០៨) នោះ ពួកម៉ែមក្នុងសាលាចូលបង្រៀនវិជ្ជា ៤ មុខ គឺមានសៀវ ប៉េរី បង្រៀនខាងភាសា និង អក្សរបារាំងសែស មានសៀវ ភូ-ឯ-ម៉ែត្រ បង្រៀនខាងពង្សាវតារសៀម និងសព្ទវិជ្ជា មានសៀវ ម៉ៃបុងបង្រៀនខាងពង្សាវតារប្រទេសឥណ្ឌូស៊ិន និងនានាប្រទេសក្នុងចុងស្រុកទិសបូព៌ា ម្យ៉ាងវិញទៀតឯក្រុមពិនិត្យសម្រួលការសិក្សាជាតិស្រុកអាយ ដែលតាំងដោយប្រកាសអារេតចុះថ្ងៃ ៨ ម៉េ ឆ្នាំ ១៩០៦ នោះ មានសៀវ ហ៊ូសេរ ចាងហ្វាងសាលាជាអធិបតី ហើយជាម៉ែមនៃពួកនេះកាលក្នុងឆ្នាំ ១៩១០ និង ១៩១៣ នោះ មានមានសៀវ ភូ-ឯ-ម៉ែត្រ ១ ឯលោកចាងហ្វាង

សាលានិងម៉មសាលានេះទាំងប៉ុន្មាន ក៏បានចូលជួយការពិនិត្យសម្រួលក្នុងការសិក្សានេះដែរ ។

មានសាលាជាន់ខ្ពស់ ២ ដែលជាសាលាប៉ុក្នុងប្រជុំដែនឥណ្ឌូស៊ីន ហើយបណ្ដាគ្រូទាំងប៉ុន្មានក្នុងសាលានេះមានម៉មរបស់សាលាបាកំងសែសម្នាក់ គឺលោកសៀរ ល. អូរូស្សូ ទទួលបង្ហាត់បង្រៀនអក្ខរវិធីបាកំងសែសនៅសាលាច្បាប់ផ្នាំគម្រប់៣និងបង្រៀនអក្សរចិននៅសាលាជំនួញ ។

## អំពីការប្រាស្រ័យបំពោះនឹងក្រុងបារាំងសែស

សាលានេះមានប្រាស្រ័យទៅនឹងក្រុមអាកាដេមីដេសាំងស្ក្រីបស្យុងអេបែលឡែត្រ គឺបានបាត់ក្រុមកុំមីស្យុងដោយឡែក ពិនិត្យការក្នុងសាលាធ្វើពត៌មានជូនទៅក្រុម អាកាដេមី ប្រាស្រ័យទៅនឹងសាលាកូឡែសនៅក្រុងបាកំងសេស គឺបានតាំងគ្រូ ១ ដែលស្ទាត់ខាងវិធីពង្សាវតារ និងវិធីភាសាក្នុងស្រុក ឥណ្ឌូស៊ីន ហើយគ្រូនេះជាអ្នកតំណាងសាលាបាកំងសែស ចំពោះនឹងក្រុងប៉ារិសផង ប្រាស្រ័យនៅនឹងក្រុមកុម្មិស្យុង ក្បាច់អលង្ការ ដែលតាំងនៅប្របសេនាបតី ក្រសួងសិក្សាធិការ មួយ៉ាងទៀតសាលានេះ បានធ្វើអំណោយជារបស់មានប្រយោជន៍ដល់មន្ទីរផ្សេង ៗ នៅក្រុងបាកំងសែសជាច្រើន ដោយមានសេចក្ដីអនុញ្ញាតពីលោក គូវែរណើរយេណេរ៉ាល់ សាលាបានឲ្យដល់ហោសៀវភៅសម្រាប់នគរ ( ប៊ីប្លីយូតែកណាស្យូណាល់ ) រឿងតន្ទ្រ និងគន្ធនៅក្នុំទីបេ ១ រឿង

រឿងកន្ធរមេន ១ រឿង  គម្ពីរចិន ១ និង សៀវភៅ ចិន ១ ដែលមានវិជ្ជាផ្សេង ៗ នៅក្នុងនោះ គឺសៀវភៅទូដួស៊ីឆេងបានឲ្យដល់មន្ទីរតាំងនៅស្រុកលូវ្រិះ គំនូរចិនធំ ៗ ៣៣ ដែលគេបានថ្វាយស្តេចស្រុកចិនពីឆ្នាំ ១៤៥៤ គំនូររឿងរ៉ាវសព្វថ្ងៃនេះ ២៦ ក្នុងគំនូរទាំង ៤ នេះមានជារូបក្នុងរដ្ឋកាលពួកសុង (ឆ្នាំ១០០០-១៣០០) គំនូរបែបទីបេ ៦ និងដុំមូល ៨៧ ដុំ ទាំងអស់នេះផ្សំឡើងបានជាការរចនា  ដែលធ្លាប់ប្រើជានិច្ចរបស់ចិនជួនបរិបូណ៌ ហើយខាងក្រោយនេះ បានឲ្យដល់ក្រុមចូលហ៊ុនក្នុងស្រុកអាស៊ី សៀវភៅសាស្ត្រាលាវជាច្រើន  បានយកទៅដាក់នៅសារមន្ទីរគីមេ  រូបថតក្បាច់រចនាជាច្រើនដែលមោនសៀរ កុម៉្ម បានថតយករូបនៅជញ្ជាំងក្រោម នៃប្រាសាទបាពួន  ហើយបានបញ្ចូលទៅជាមួយរូបទាំងនេះទៀត  រូបថតឯទៀត ៣ បែប ដែលតម្កល់នៅក្នុងទីចាត់ហ្វាងស្មៀនរបស់សាលា  គឺរូបជញ្ជាំងក្រោមប្រាសាទបាយ័ននៅអង្គរធំ ដែលពួកមិស្សេង ឌុហ្វួរ និងការប៉ូ ថតកាលពីឆ្នាំ ១៩០១ ទីង ១៩០៤  និងរូបអង្គរវត្ត និង បន្ទាយឆ្មារដែលសេណេក៉ាល់បីល្យេ  ថតកាលក្នុងឆ្នាំ ១៩១០ ។

## អំពីម៉មសាលាដែលមរណភាព ដោយធ្វើការតបស្នងដល់ក្រុងបារាំងសែស ។

យើងត្រូវបញ្ចប់រឿងរ៉ាវអំពីសាលានេះ  ដោយរំលឹកដល់ពួកម៉មដែលចេញពីសាលាទៅគឺ ៖

ប្រូស្ពែរអូដង្គហ័ល ១ ជាអាទ៌មីនិស្រ្តាទ័រដេសែរវីសស៊ីវិល ដែលចាត់ឲ្យមកទីងសាលាបារាំងសែស ហើយដែលមរណភាព ដោយពួកជ្រាយសម្លាប់កាលពីថ្ងៃ ៧ អាព្រិល ឆ្នាំ ១៩០៤ នៅវេលាដែលដើរធ្វើមិស្សុង សាលិការប៉ូ ១ ជាមេការនៅសាលាបារាំងសែស មរណភាពនៅក្រុងព្រៃនគរ ពីថ្ងៃ ២៨ យូកាំង ឆ្នាំ ១៩០៤ ដោយចាប់ជម្ងឺឈឺវេលាដែលធ្វើមិស្សុងអង្គរធំ ។

ឯឌូអាហ៊ុបែរ ១ ជាគ្រូនៅសាលាបារាំងសែស មរណភាពនៅស្រុកវិញទ្បុង ពីថ្ងៃ ៥ យ៉ាំងវីយេ ឆ្នាំ ១៩១៤ នៅវេលាដែលដើរធ្វើមិស្សុង ។

សិកដឺម៉ាស៊ីរ ១ ជាគ្រូនៅសាលាបារាំងសែស គេសម្លាប់នៅសឹងឌុលពព្រហ ( ជារដារណោល ) ពីថ្ងៃ ១ មេ ១៩១៥ ។

សង់កុម៉ែ ១ ជាអ្នកថែរក្សាអង្គរ គេសម្លាប់នៅអង្គរពី ២៩ អាព្រិល ១៩១៦ ។



# ដើមកំណើតប្រាសាទអង្គរ

(តពីខ្សែ ៣)

## លោក ល្វី-ហ្វីណូត៍ ចាងហ្វាងសាលាបារាំងសែស

នៅចុងបូព៌ាប្រទេស ហាណូយ ជាអ្នកអធិប្បាយ

ក្រុមការ ជុំ - ម៉ៅ ធ្វើកិច្ចការនៅព្រះរាជបណ្ណាល័យ

ប្រែចេញជាភាសាខ្មែរ

---

ប្រាសាទបាយ័នមានរាង ៤ ជ្រុង ធំក្រោមតូចលើ មាន ៣ ថ្នាក់ ថ្នាក់ ២ ខាងក្រោម ហើយថ្នាក់ ១ ដែលខ្ពស់ជាងគេនោះ មានកំពូលទៅទៀត ដែលជាកន្លែងសម្រាប់ធ្វើសន្និបាត ប៉ុន្តែកំកណ្តាលនេះ តាំងខាងក្រោម តាំងកំពូល មិនធ្វើឲ្យដូចជាផែនទីជំបូងនោះទេ តាមផែនទីដើមថែវនៃថ្នាក់ទី ២ នោះព័ទ្ធជុំវិញម្ខាង ១ ជាខ្លួនដើងក្អែក ហើយត្រូវជាប់ទៅលើថ្នាក់ក្រោះនៃប្រាសាទនោះ ឯទីសន្និបាតកណ្តាលនោះមានទំហំល្មម អស់តាំងកំពូលថែវទាំងនោះ មានខ្លោងទ្វារធ្លាក់ក្បាច់ជំផ្ចិតផ្ចង់នៅកន្លែងកាល ទីងមានពន្លឺពេញ សព្វថ្ងៃនេះខ្លោងទ្វារទាំងនោះមើលមិនឃើញឡើយ ។ ចុះដោយហេតុអ្វី បានជាមើលមិនឃើញ គឺថាជាក្រោយគំនិតថ្មីទៀតនោះ ថ្នាក់ខាងលើបានបន្ថែមខ្ពស់ និងពង្រីកឲ្យទូ-លាយឡើង ទូលាយលុះដល់ទៀបទីងប៉ះថែវខាងក្រោម មកគាំទីងខ្លោងទ្វារដែលចូលខាងក្រៅ ខ្លោងទ្វារទាំងនេះបាត់អស់មើលមិនឃើញ

ដោយអំណាចប៉ះភ្លិតជាថ្មីទាំងអស់ ឯប៉ះនោះដួនកាលទុករបស់ចាស់ ឲ្យនៅ ដួនកាលកាត់ខ្ទះចេញ ដោយរបស់ទាំងនោះនៅទាបជាង ឬខ្ពស់ជាងបន្ទាត់ ដែលគេប៉ះគ្នានេះ ។

កាលក្នុងឆ្នាំ ១៩២៣ គេនៅត្រឹមសេចក្ដីត្រង់នេះ លុះដល់មោន សៀវប៉ារមង់ទេ ជាអ្នកពិនិត្យប្រាសាទបាយ័ន ចង់មើលខ្លោងទ្វារ ១ ឲ្យច្បាស់ទឹងពន្លឺថ្ងៃ ក៏បានឲ្យគាស់បំណាស់ ដែលប៉ះនៅថ្នាក់ខាងលើ ដែលបាំងនោះចេញ លុះភ្លឺច្បាស់ទៅ ទើបឃើញលេចរូប ១ ឡើង គឺរូបទេវតា ១ ឈរលើត្របកឈូក ដៃទាំង ៤ កាន់នូវផ្គាំ សៀវភៅ ផ្កាឈូក និងគ្រឿង ១ ទៀតបាក់ដាច់ ប្រហែលដូចជាដប ១ នៅកំពូលម្កុដខាងមុខមានព្រះពុទ្ធរូប ១ ។ ជាឥតប្រយោជន៍ នឹងយោបល់ទៅឆ្ងាយ អំពីទ្រង់ទ្រាយរូបនេះ ព្រោះរូបកង់ធ្វើមិនឲ្យមានសង្ស័យសោះ គឺជារូបពោធិសត្វលោកេស្វរ ឬអវលោកេតេស្វរ ជាអ្នកទ្រទ្រង់នូវមនុស្សជាតិ និងជាអ្នកធ្វើឲ្យជាដម្បី ។

សួរថាតើខ្លោងទ្វារនេះ ប្លែកតែឯងពីគេក្នុងខ្លោងទ្វារទាំងអស់ជុំវិញក្នុងកណ្ដាលនោះឬអ្វី ឆ្លើយថាមិនមែនដូច្នោះឡើយ ។

គេបានឃើញរូបលោកេស្វរ ១ ទៀត ដូចជារូបមុននោះដែរ ប៉ុន្តែដោយនៅ ៗ ទីខ្ពស់ជាងមុន នោះគេបានកាត់ព្រះកេសចេញ នូវលោ ដែលគេប៉ះនូវមេដំបូលខាងលើ ឃើញមានរូបមនុស្ស ២ បាក់បែក

ប្រហែលជាព្រះពុទ្ធរូបទ្រង់ក្មេង រូបឈរជាច្រើនបាក់កំបុត ហើយធ្លាក់ទៅជាលីង្គវិញ ឃើញមានរូបព្រះឥន្ទ្រជិះដំរី តមកទៀតមានរឿងព្រាហ្មណ៍ដំទង់ម្នាក់ ត្រូវព្រួញស្ដេចទសរថស្លាប់ ប្រហែលជាធ្វើតាមរឿងសាមជាតក ។

ក្នុងជំនុំខ្លោងទ្វារទាំងអស់ មានខ្លោងទ្វាររឿងព្រះឥសូរតែមួយ នៅលើដំណើរមុខខាងជើង ខ្លោងទ្វារនោះធ្វើជារូបព្រះឥសូរ មានព្រះព្រហ្មនិងព្រះនារាយណ៍ លុតជង្គង់ប្រណម្យធ្វេងស្ដាំ ព្រះឥសូរឈរក្នុងប្រឡោះទ្វារមានរនាំង ២ ជាន់ៗម្នាក់មកខាងក្រោយ ដៃខាងស្ដាំកាន់ផ្គាំ ដៃខាងឆ្វេងកាន់បែបជាពាន ១ នៅមេទ្វារខាងលើ គេឃើញមានរូបដីញក់ ឬរូបក្រពើ ប្រជុំរូបទាំងអស់ហាក់ដូច ទំនងជាធ្វើជារឿងការ មិនមែនជាធ្វើសម្រាប់គោរពឡើយ លើកលែងតែខ្លោងទ្វារ១នេះ ខ្លោងទ្វារទាំងអស់ឯទៀត ក្នុងថៃវជាន់ទី ២ នោះ សុទ្ធតែឬទុកជាខ្លោងទ្វារខាងពុទ្ធសាសនាទាំងអស់ ។

យើងឡើងទៅលើមេដំបូល យើងបានឃើញនៅទីនោះ បំណែកព្រះពុទ្ធអង្គ ដែលបាក់បែកកាត់កយជាច្រើន គឺស្នាមណ្ដៅដែលបន្ទប់នូវពុទ្ធរូបធ្វើជាកំពូល គេវាយកំទេចចោលទាំងអស់ លើកតែរូបខ្លះដែលធ្វើពងជាឥសី នោះគេទុកទាំងអស់ មានកន្លែងសន្និបាត ១ តូចខាងទិសឦសាន នោះរូបទាំងឡាយគេបំផ្លាញកំទេចចេញទាំងអស់ ឯប្រាសាទ

តួប ១ ដែលជាប់ពីបន្ទប់ ខាងត្បូងប្រាសាទធំក៏ដូចគ្នាដែរ ស្នាមដែលនៅសល់លើខ្លោងទ្វារខាងត្បូងនោះ ធ្វើឲ្យយើងសម្គាល់បានជាពុទ្ធរូប ១ អង្គទ្រង់នាគ និងរូបលោកេស្វរ ១ អង្គ ឈរនៅលើសសរ និងជញ្ជាំងតពីកន្លែងមហាសន្និបាតទៅ នោះរូបព្រះពុទ្ធទាំងឡាយដែលបានឆ្លាក់ជាប់នៅជាប់នៅនោះ គេបានខុសចេញ ប៉ុន្តែនៅមើលច្បាស់ជាប្រាកដ ហើយនៅលើជញ្ជាំងកំពូលទៀត ក៏ឃើញពុទ្ធរូបជាច្រើនដែលគេវាយបំបាក់ចេញ ឬធ្លាក់ទៅជាលិង្គវិញ ។

សួរថា ចុះអ្វីខ្លះ ដែលជារបស់សម្រាប់សាសនាព្រះឥស្សូរជាប្រាកដនៅក្នុងបន្ទាយបាយ័ននោះ ឆ្លើយថាខ្ញុំស្មានថាមានតែរបស់តែប៉ុន្មានដូចមានខាងក្រោយនេះទេ គឺ ១ ជញ្ជាំងថែវខាងក្នុង ឯជញ្ជាំងថែវខាងក្រៅនោះគ្មានឆ្លាក់រូបអ្វីទេ ២ មានអាស្រម ៣ ឬ ៤ មួយសម្រាប់វិស្ណុ ឬព្រះនារាយណ៍ ក្រៅពីនោះសម្រាប់សិវឬព្រះឥស្សូរទាំងអស់ វត្ថុទាំងប៉ុន្មាននេះនឹងថាទើបនឹងសាងជាក្រោយប្រាសាទនោះក៏ថាបាន ហើយសេចក្តីដែលថាទើបសាងជាក្រោយនោះ ឃើញពិតប្រាកដណាស់ដល់អាស្រម ១ ក្នុងពួកអាស្រមទាំងប៉ុន្មាន ដែលខ្ញុំទើបនឹងនិយាយខាងលើនេះ ដែលនៅក្នុងព្រំខាងទិសឦសាននៃថ្នាក់ទី ២ បើគេទៅឈរពីខាងមុខអាស្រមនេះ មានជើងក្នុងកណ្តាលនៅពីខាងត្បូង ហើយមានថែវដែលព័ទ្ធជុំវិញខាងស្តាំ នោះគេនឹងឃើញខ្លោងទ្វារ ១ នៅពីខាងមុខជា

កណ្តាលជញ្ជាំង ២ ផ្ទាំង ក្រោមទ្វារនោះមានរូបសិវគឺព្រះឥសូរ ឯជញ្ជាំងនៅទិសខាងកើតមានរូបលិង្គ ហើយឯជញ្ជាំងនៅជ្រុងខាងលិចវិញនោះនៅទទេគ្មានធ្លាក់អ្វីសោះ សួរថាតើដោយហេតុអ្វីបានជាយ៉ាងដូច្នេះ ឆ្លើយថាដោយហេតុបន្តិចសោះទេ គឺជញ្ជាំងនេះហៀបនឹងប៉ះដល់ដើមក្នំកណ្តាលហើយជាងធ្លាក់គ្មានកន្លែងកល នឹងលូកដៃធ្លាក់ទៅធ្លាក់បាន គឺជាកំស្ពុតាងថា អាស្រមសម្រាប់សិវនេះ ទើបនឹងសាងជាគ្រាក្រោយប្រាសាទនោះ នៅលើកន្លែងដែលមិនបានបម្រុងទុកនឹងសាងឡើង ។

សេចក្តីត្រង់នេះ មានបុរាណថា ចុះប្រាសាទសម្រាប់ព្រះឥសូរម្តេចក៏ឲ្យមានលាយឡំរូបផ្សេង ១ សម្រាប់ពុទ្ធសាសនា ដែលគេឃើញមាននៅជុំវិញកន្លែងសន្និបាត ហើយនឹងរឿងក៏វាជាច្រើន នៅជាប់នឹងជញ្ជាំងបន្ទប់សន្និបាតនោះផង ឆ្លើយថាតាមគំនិតខ្ញុំ ការទាំងនេះនឹងយកជាប្រមាណមិនបាន ខ្ញុំមិនមែនមិនដឹងទេ ថានៅក្នុងស្រុកខ្មែរនេះ មានសាសនាលាយឡំចូលគ្នា ដោយមានពួកដូចគ្នា ហើយដោយសេចក្តីអនុញ្ញាត អំពីម្ចាស់ផែនដីនឹងសេនាបតី ស្តេចយសោវរ្ម័ន បានសាងប្រាសាទ ២ ប្រាសាទ ១ សម្រាប់សាសនាព្រាហ្មណ៍ ១ ទៀតសម្រាប់ពុទ្ធសាសនា ។

ស្តេចរាជេន្ទ្រវរ្ម័ន គ្រងរាជពីសករាជ ៨៦៦ ទៅដល់ ៨៩០ ត្រូវនឹងគ្រិស្តសករាជ ៩៤៤ ដល់ ៩៦៨ ជាក្រស័ត្រកាន់សាសនាព្រះឥសូរ

មានសេនាបតីម្នាក់កាន់ពុទ្ធសាសនា សេនាបតីនោះ បានសាងប្រាសាទ សម្រាប់សាសនាព្រាហ្មណ៍ថ្វាយស្តេច និងសាងប្រាសាទ សម្រាប់ពុទ្ធសាសនាសម្រាប់ខ្លួនឯង ជាក់នៅប្រាសាទព្រះខ័ន បានបញ្ចូលធម៌ព្រះឥស្សរនិងធម៌ព្រះពុទ្ធជាមួយគ្នា ។

យើងសម្គាល់បានថា សេចក្តីចូលគ្នានេះ មានលក្ខណៈខ្លះគឺចូលគ្នាតែដោយសម្តី មិនបានជាចូលដល់ទៅរួមវិហារ ជាមួយគ្នានោះទេ មហាក្សត្រិយ៍បានសាងទីសន្និបាតតាំងឡាយ សម្រាប់ព្រះផ្សេងៗ មានសម្រាប់ព្រះពុទ្ធផង ឯសាសនាដែលនៅជិតគ្នា តែមិនមែនសត្រូវនឹងគ្នា នេះមានការស្រមជាច្រើនផ្សេងពីគ្នា នៅក្នុងវិហារជាមួយបាន ប៉ុន្តែបើស្តេចកាន់សាសនាព្រះឥស្សរ បានសាងប្រាសាទ ១ សម្រាប់លិង្គជាអ្នកទ្រទ្រង់នៅនគរ ហើយមករៀបតុបតែងនូវរូបព្រះពុទ្ធ និងរូបព្រោធិសត្វជុំវិញជាច្រើន ទុកជារបស់គោរពផងទៀត នោះឃើញថាជាសេចក្តីពិ-បាកនឹងគិត ហើយគួរឲ្យសង្ស័យ ។

សេចក្តីដែលឲ្យសង្ស័យក្នុងស្ថាននេះ យើងត្រូវទុក ១ អន្ទើសិន ហើយយើងត្រូវពិចារណាសួរថា តើប្រាសាទបាយ័ន មិនមែនជាសាងសម្រាប់ពុទ្ធសាសនា ជាមុនដែលនឹងបានមក សម្រាប់សាសនាព្រះឥស្សរទេឬអ្វី ការត្រង់នេះបើនឹងនិយាយទៅ ហាក់ដូចជាឃ្លាតពីសេចក្តីដែលគេធ្លាប់ជឿតៗមក ។

យើងបញ្ឈប់បន្តិចទៅចុះ ហើយពិចារណាថា ប្រសិនបើប្រាសាទកណ្ដាលនៃទីក្រុងនោះ ជាប្រាសាទសម្រាប់ពុទ្ធសាសនាហើយ តើទីក្រុងទាំងមូលនោះ កាន់ពុទ្ធសាសនាដែរឬទេ ។

បើឆ្លើយឲ្យត្រូវនឹងសេចក្ដីប្រាថ្នា គួរតែឲ្យពិចារណាដល់ទីឋានដែលមានជាប្រធាន នៅក្នុងក្រុងនោះ គឺទ្វារនឹងកំផែងជុំវិញ ស្ទើរថាចុះតើទ្វារនោះ នឹងឲ្យយើងបានដឹងការយ៉ាងណាខ្លះ ឆ្លើយថាខ្លោងទ្វារទាំង-ឡាយនោះ បាក់បែកអស់ទៅហើយ នៅសល់តែចំណែក ១ គង់នៅៗ ទ្វារជ័យ ចំណែកនោះឃើញជាកង់បង្កើរឆ្វង និងក្បាលរូបមនុស្ស ១ ឈរជាកណ្ដាលរូបហោះឯទៀតជាច្រើន លុះធៀបរូបនេះទៅនឹងរូបឯទៀត ដែលមានភាពដូចគ្នា នាំឲ្យសម្គាល់បានថា រូបនេះជារូបលោកេស្វរ ។

បន្ទប់ខាងលើនៃទីដែលហៅថា គោបុរៈ នោះមានខ្លោងទ្វារបន្ទុប នូវរូបទាំងអស់ ឃើញមានសល់រូបខ្លះដែលគង់នៅ គឺសុទ្ធតែជាព្រះពុទ្ធរូបទ្រង់ក្ខែន ។

ឥឡូវនេះ បើយើងឡើងទៅលើបន្ទាយក្រៅ ហើយដើរជុំវិញមើលទៅប្រាសាទជ្រុងទាំងបួន នោះយើងគ្មានសង្ស័យអ្វីសោះ រូបលោកេស្វរធំៗ និងលេចឡើងដេរដាស នាំឲ្យយើងស្គាល់បានដោយងាយ ។

ឯសេចក្ដីយល់ឃើញនោះយ៉ាងដូច្នេះ គឺថាលោកេស្វរនោះជារូប

ទេវតា ដែលមានដៃជើងច្រើននៅអង្គរធំ ហើយអង្គរធំនេះ ដែលគេស្មានថា សង់សម្រាប់សាសនាសិវជាដរាបមកនោះ កាលវេលាសាងនោះគេសាងសម្រាប់ពុទ្ធសាសនាទេ ។

សេចក្តីយល់ឃើញនេះ ទាស់គ្នាយ៉ាងធំ នឹងគំនិតដែលធ្លាប់ជឿមកហើយ ដែលយើងត្រូវតែកែសំអាងអំពីសេចក្តីយល់ឃើញនេះ ដោយរករឿងប្រហែលគ្នាមកអធិប្បាយ គឺថា យើងបានដឹងជាមានប្រាសាទ១ផ្សេងទៀត មានបែបផែនប្រហែលនឹងអង្គរធំដែរ ដែលហៅថាប្រាសាទបន្ទាយឆ្មារ ។

( មានតទៅខ្សែក្រោយទៀត )

